សារព័ត៌មាន ខ្មែរផុស ស.រ.អា

# KhmerPost USA

E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 1 (267) 253-3947

មាតិការរឿង Vol 07 Issue 142- Nov22rd- Dec05th. 2013

Free



New Office: Tel: (978) 677-7163 Fax: (978) 677-7092
45 Merrimack St. Suite 218A Lowell, MA 01852

## វត្តត្រៃរតនារាមៈ សំណាងរួបរួមគ្នាតែមួយនៅស្តួចស្តើង

### Tray Ratanaram Temple : The Chance of Unification is minimal

**ឡូវែល :** វត្តត្រៃរតនារាមត្រូវបង្ខំឱ្យបិទទ្វារ ពុទ្ធបរិស័ទនាំគ្នាទៅធ្វើបុណ្យនៅវត្តពន្លឺពុទ្ធច័ត្រវិញ ទំនងជាមានខ្លះដែរ នាំគ្នាទៅធ្វើបុណ្យនៅវត្តខ្មែរឡូវែល ឬវត្តសហគមន៍ព្រះសង្ឃខ្មែរដែល




កំពុងតែខិតខំកសាងឈ្មោះឡើងវិញ បន្ទាប់ពីមានរឿងអាស្រូវ និងរឿងវិបត្តិគ្រប់គ្រងវត្តបានត្រូវបាតុកម្មពុទ្ធបរិស័ទចំណុះជើងវត្តថ្កោលទោសជាច្រើនដងមក ។ គួររំលឹកផងដែរថា វត្តត្រៃរតនារាមនេះ តទៅទំព័រទី ០៦

## រីកឆាត ហារ ឪពុកផ្តល់ឈ្មោះឱ្យស្ពានថ្មីនៅឡូវែល

ស្ពានថ្មីមួយនៅឡូវែល ដែលធ្លាប់ជាតំបន់សាកលវិទ្យាល័យ "យូម៉ាស" ខាងជើង និងខាងកើតបានត្រូវសម្ពោធដោយក្រុមអាជ្ញាធរ និងតំណាងក្រុងឡូវែលកាលពីថ្ងៃទី១៩ ខែវិច្ឆិកា ឆ្នាំ២០១៣ ដោយមានឧទ្ទិសនាមលោករីកឆាត ហារ ឪពុកជាកិត្តិយសឱ្យស្ពាននោះផង ។

លោក រីកឆាត ហារ ឪពុក រស់នៅតាំងពីតូចនៅផ្លូវ Shaw Street រៀនចប់សាលាកេយត៍ អាកាដេមី បានអាហាររូបករណ៍ពីការចំណាន លេង "បេសបុល" ជាតារាឯក។ បន្ទាប់មកចូលបម្រើកងទ័ពដែលនៅពេលចប់បេសកម្ម ក៏ចូលរៀនសាលាច្បាប់បានសញ្ញាប័ត្រ ពីមហាវិទ្យាល័យស៊ើហ្វតថែមទៀត ។

ឆ្នាំ១៩៦៥ បានឈរឈ្មោះជាប់ជាសមាជិកក្រុមប្រឹក្សាក្រុង ហើយរក្សាដំណែងចំនួន៤០ឆ្នាំ ហើយក្នុងចំនួនឆ្នាំទាំងអស់នោះ ក៏មានជាប់ជាចៅហ្វាយក្រុង (Major) ចំនួន៤អាសន្ន ។ ឆ្នាំ១៩៨៧ រដ្ឋាបាលសហព័ន្ធ បានគម្រោមយកសាលាក្រុង ទាំងអស់ តទៅទំព័រទី ១០

## New Bridge Dedicated to Richard P. Howe Sr.

By Jennifer Myers, Mayor's Aid
Photo Courtesy by City Hall Official Blog "Room 50"

"A bridge is a pathway over an obstruction," Martha Howe said at Tuesday morning's dedication of the bridge spanning the Merrimack River named in honor of her father, former 40-year City Councilor and four-term Mayor Richard Howe Sr.

Richard Howe Sr., 80, grew up on Shaw Street and after graduating from Keith Academy, earned a baseball scholarship to Providence College where he was a star

Continued to Page 10


The Howe's Family

Richard P. Howe Bridge

## ប្រវត្តិនិងទម្លាប់បុណ្យ "ថេងគ្ស៊ីវីង"

ប្រជាពលរដ្ឋអាមេរិកាំងបានត្រូវឈប់សម្រាកការងារមួយថ្ងៃនៅទី២៨ ខែវិច្ឆិកានេះ ដើម្បីប្រារព្ធបុណ្យ "ថាំងគ្ស៊ីវីង"ដែលជាបុណ្យដ៏ប្រជាប្រិយភាពមុនពេលពលរដ្ឋអាមេរិកាំងចាប់ផ្តើមធ្វើដំណើរទៅជួបជុំគ្រួសារនាឱកាសបុណ្យដាច់ឆ្នាំនីមួយៗ ។

បុណ្យនេះផ្តើមឡើងនៅពេលដែលជនជាតិ
តទៅទំព័រទី ០៨

## Thanksgiving History and Tradition

**by Richard P. Howe Jr.**

The first English settlers arrived in Massachusetts in the fall of 1620. Their long voyage across the Atlantic Ocean left them with little food for the brutal New England winter. But for the generosity of the indigenous people who shared their food, all of the English would have starved to death. Even with that assistance, half of the
**Continued to page 08**



## អ្នកធ្វើការតាមដងផ្លូវ UTEC Street Worker

**ដោយ :សុខា**

**ក្រុងឡូវែល :** មុខងារមួយនេះ ស្តាប់ទៅប្លែក "អ្នកធ្វើការតាមដងផ្លូវ!"។ កិច្ចការនេះជាមួយក្នុងចំណោមបេសកកម្មសំខាន់ៗដែលជាសកម្មភាពក្នុងមជ្ឈមណ្ឌលយុវជន ដើម្បីភាពស្មើគ្នា ឬ United Teen Equality Center (UTEC) ។

ថ្ងៃពុធ ទី១៣ ខែវិច្ឆិកា ឆ្នាំ ២០១៣ ក្រុមអ្នកធ្វើការតាមដងផ្លូវ UTEC Street Worker បានទៅធ្វើបទបង្ហាញពីសកម្មភាពរបស់ខ្លួន ដោយមានការសហការអញ្ជើញពីក្លឹបនិស្សិតថ្នាក់ក្រោយឧត្តមជំនាញសន្តិភាព និងការសិក្សាអំពីទំនាស់ (Peace and Conflict Studies Graduate Association Club) នៃសាកលវិទ្យាល័យរដ្ឋម៉ាសាឈូសេតឡូវែល(UMASS LOWELL) ។ តទៅទំព័រទី ៣

# ធុងសម្រាមដាក់ "កាកសំណល់យកទៅផលិតឡើងវិញ"

**នឹងមកដល់នៅដើមខែ ទៅពាក់កណ្តាលខែធ្នូ**
**សូមសរសេរអាស័យដ្ឋានរបស់អ្នកលើធុងនោះឲ្យបានច្បាស់លាស់**
**សូមចាប់ផ្តើមប្រមូល "កាកសំណល់យកទៅផលិតឡើងវិញ" ទុកដាក់ឲ្យបានស្អាត**




























**រួមគ្នា... "ចាប់ផ្តើមទាំងអស់គ្នាថ្ងៃនេះ"!**

ក្រដាសនានា

ក្តារក្រដាស

សំបុត្រចាស់ៗ

ដប / ធុង
ប្រដាប់ប្រដាប្លាស្ទិក

ប្រអប់/កាដុងក្រដាស់ស្តើងៗ

កាសែត (រាប់ទាំងពាណិជ្ជកម្ម
ដែលនៅខាងក្នុង)

ដប និងក្រឡកែវ

កំប៉ុង / របស់
អាលុយមីញ៉ូម

**សូមកុំទុកធុងលើចិញ្ចើមថ្នល់
ដល់ខែមករា !**

**www.LowellRecycle.org**

# តមកពីទំព័រទី ១ អ្នកធ្វើការតាមដងផ្លូវ...

ផ្អែកលើសេចក្តីនៃបទបង្ហាញអ្នកធ្វើការតាមដងផ្លូវរបស់យូធិច (UTEC) ជាអ្នកដែលធ្វើការដោយផ្ទាល់ជាមួយក្រុមយុវជនទំនើងដែលជាទូទៅអ្នកផងពិបាកនឹងចូលទៅដល់ក្រុមទាំងអស់នោះ។ ស្រ្ទីតវឺកខឺ ឬអ្នកធ្វើការតាមដងផ្លូវធ្វើការពេញម៉ោង និងអាចជាការងារ ២៤.៧ ព្រោះអ្នកធ្វើការតាមដងផ្លូv UTEC Street Workerមិនត្រឹមតែព្យាយាមប្រាស្រ័យទាក់ទងជាមួយក្រុមក្មេង ឬយុវជនទំនើងប៉ុណ្ណោះទេ ខណៈមានការវាយតប់បាញ់បោះ ឬឧបទ្ទហេតុផ្សេងៗអ្នកធ្វើការតាមដងផ្លូវ UTEC Street Worker នឹងទៅដល់ពិនិត្យ និងធ្វើការទៅតាមកាលៈទេសៈអាចជាការជួយពន្យល់សម្របសម្រួលគូទំនាស់ ឬបង្ហាញខ្លួន ដើម្បីកសាងទំនុកចិត្តពីក្រុមទំនើងទាំងអស់នោះ ព្រោះការចូលទៅជិតអ្នកញៀនថ្នាំ ហ្គាង ឬក្រុមបងតូចបងធំ ពុំមែនជា រឿងងាយស្រួលឡើយ ហើយម្យ៉ាងវិញទៀតអ្នកទាំងអស់នោះតែងមិនទុកចិត្តក្នុងការទាក់ទងជាមួយអ្នកដទៃ ត្បិតបារម្ភថា ខ្លួននឹងត្រូវរាយការណ៍ដល់ប៉ូលិសក្នុងការប្រព្រឹត្តផ្ទុយនឹងច្បាប់ទាំងឡាយ។


Johny Chheng (ចនី ឆេង



Utec streetworkers

ផ្ទុយពីចំណុចបារម្ភដែលក្រុមទំនើងមានចំពោះអ្នកធ្វើការតាមដងផ្លូវ UTEC Street Workerបេសកកម្មរបស់អ្នកធ្វើការតាមដងផ្លូវ UTEC Street Worker គឺដើម្បីជួយក្មេងទំនើងទាំងឡាយម្តងបន្តិចៗ ឱ្យដកខ្លួនចៀសវាង និងកែប្រែខ្លួនពួកគេឱ្យក្លាយជាមនុស្សល្អអាចត្រឡប់ទៅរៀននៅសាលាវិញ ឬទៅរៀនយកជី អ៊ី ឌី (GED) ជាមធ្យោបាយទៅអនាគតបំពេញការងារឱ្យក្លាយជាពលរដ្ឋល្អដូចគេឯង ហើយដែលចូលចុះក្នុងសង្គម និងសាធុជនទាំងឡាយ។



Jonathan Lunde
Miguel Torres

អ្នកធ្វើការតាមដងផ្លូវ UTEC Street Worker អាចចូលទៅជិតក្រុមជនទំនើងទាំងអស់នោះ តាមរបៀបជាច្រើន ដូចជាដោយលេងបាល់ជាមួយពួកគេទៅទីកន្លែងទាំងឡាយដែលពួកគេនៅទៅជួយដោះស្រាយបញ្ហាការវាយតប់បង្កើតភាពស្និទ្ធស្នាលជាមួយអ្នកទាំងនោះ។ ខណៈដែលអ្នកធ្វើការតាមដងផ្លូវ UTEC Street Worker អាចអន្ទងជនទំនើងបានហើយ អ្នកធ្វើការតាមដងផ្លូវ UTEC Street Worker នាំអ្នកទាំងនោះ ឱ្យចូលរួមវគ្គបណ្តុះបណ្តាលអប់រំកែប្រែចិត្តគំនិតឡើងវិញ។ កិច្ចការនេះត្រូវចំណាយពេលយូរតួយ៉ាងលោក មីហ្គែល ថូរេស៍ (Miguel Torres) បានលើកឡើងក្នុងបទបង្ហាញថា "That is not something you do over night, it takes time, months, years to build trust, relationship, and bring them to the center..." មានន័យថា "វាមិនមែនជាការងារដែលយើងធ្វើតែមួយយប់ ហើយរួចរាល់ទេ គឺត្រូវការអាចដល់ខែ ឬឆ្នាំ ដើម្បីកសាងទំនុកចិត្តជាមួយក្មេងទំនើងទាំងអស់នោះ ចងមិត្តភាពជាមួយពួកគេ និងដឹកនាំពួកគេឱ្យមកទទួលការបណ្តុះបណ្តាលកែប្រែខ្លួននៅមជ្ឈមណ្ឌល។"

បេសកកម្មរបស់អ្នកធ្វើការតាមដងផ្លូវ ឬ Street Worker ដែលផ្តល់ដោយ UTEC មានប្រសិទ្ធភាព ហើយបានចូលរួមជាប្រយោជន៍ជាច្រើនក្នុងការជួយកែប្រែជនទំនើងក្នុងសហគមន៍ឱ្យចេះភ្ញាក់រលឹកដឹងកំហុសស្គាល់ខុសត្រូវចេះកែប្រែខ្លួនឱ្យក្លាយជាមនុស្សល្អដូចអ្នកផង។ ឧទាហរណ៍ជាក់ស្តែង UTEC បានជួយកែប្រែអតីតយុវជនទំនើង និងស្បត់ខលលី (Former Gang and Shot Caller) ឈ្មោះ ចននី ឆេង (Johny Chheng) ឱ្យបានក្លាយមនុស្សល្អមួយរូបលាលែងការប្រព្រឹត្តអំពើមិនល្អ ហើយបច្ចុប្បន្ន ចននី ឆេង (Johny Chheng) កំពុងបម្រើការងារជាអ្នកធ្វើការតាមដងផ្លូវ Street Worker នៅ TEC ជួយណែនាំកែប្រែយុជនទំនើងដទៃទៀតក្នុងសហគមន៍យ៉ាងសកម្ម។ Johny Chheng ចននី ឆេង បានក្លាយជាយុវជនទំនើងពេញទីនៅអាយុ១៦ឆ្នាំធ្លាប់វាយតប់បង្ករបួសស្នាមដល់អ្នកដទៃធ្លាប់ជាប់ពន្ធនាគារ និងបានចេញពីពន្ធធនាគារនៅអាយុ២៣ឆ្នាំ។ ខាងក្រុមការងារ UTEC ធ្លាប់បាន ព្យាយាមទាក់ទងណែនាំ ចននី តាំងពី ចននី អាយុ១៤ឆ្នាំ ប៉ុន្តែកិច្ចការទាំងអស់នេះប្រើពេលយូរទំរាំតែដល់ពេលដែលចននីចេញពីពន្ធធានាគារកាលពី៦ឆ្នាំមុន ហើយចននីបានទទួលស្គាល់ និងឱ្យតម្លៃ UTEC គេក៏ចាប់ផ្តើមកែខ្លួន និងក្លាយជាបុគ្គលិកសកម្មនៅ UTEC នាពេលបច្ចុប្បន្ននៅអាយុ២៨ឆ្នាំ។

គួរបញ្ជាក់ផងដែរថា លោក ក្រិក ក្រូតូ (Gregg Croteau) ជានាយកប្រតិបត្តិ (Executive Director) នៃមជ្ឈមណ្ឌលយុវជន ដើម្បីភាពស្មើគ្នា ហៅកាត់ថា UTEC ហើយមជ្ឈមណ្ឌលនេះ កកើតឡើងនៅឆ្នាំ១៩៩៩ មានចក្ខុវិស័យ និងបេសកកម្មចម្បងក្នុងការស្តាបនាយុវជនពិសេសយុវជនទំនើងក្នុងសហគមន៍ឱ្យក្លាយជាមនុស្សល្អរស់នៅក្នុងសេដ្ឋកិច្ចមួយសមរម្យដែលសង្គមទទួលស្គាល់៕


លោក ក្រិក ក្រូតូ (GREGG CROTEAU-MSW-LCSW)
ជានាយកប្រតិបត្តិ (Executive Director) នៃមជ្ឈមណ្ឌលយុវជន ដើម្បីភាពស្មើគ្នា (UTEC)


ក្លិបនិស្សិត PCS Graduate Association Club 2013
ជូនកាដូអនុស្សាវរីយ៍ដល់ក្រុម UTEC Streetworkers
ដែលបានអញ្ជើញមកធ្វើបទបង្ហាញនៅ UMASS LOWEL

**ដោយ : ពិន សំខុន**

ដើរទស្សនាមិនបានប៉ុន្មានផងក៏មកដល់សប្តាហ៍ដែលរៀបឥវ៉ាន់ត្រឡប់មកស.រ.អាទៅហើយយ៉ាងលឿនបំផុត ! យើងឆ្លៀតឱកាសនៅសល់បីថ្ងៃទៀតទៅកំសាន្តនៅវិហារសាក្រេកឺឱ្យទាល់តែបាន ។ សាក្រេកឺ (Sacre Coeur) ជាតំបន់ដែលខ្ពស់ជាងគេនៅក្រុងប៉ារីសនៅលើកំពូលភ្នំនោះព្រះវិហារគ្រីស្តសាសនាដ៏ធំស្អាត( តំរូប្រាសាទតាស្នាហាល់នៃប្រទេសឥណ្ឌា) ទេសចរប្រាថ្នាទៅទស្សនាទីនោះណាស់ ។

យើងព្យាយាមទៅទីនោះច្រើនដងតែទៅមិនដល់ដោយសារយើងជិះរថយន្តផ្ទាល់ខ្លួនលំបាកនឹងរកច្រកចូលឡើងភ្នំមិនឃើញ ។ លើកនេះយើងប្រើមធ្យោបាយដឹកនាំក្រុងដែលយើងអាចធ្វើដំណើរលឿនស្រួលខ្លួន ហើយអស់តម្លៃថោកបំផុត ។ យើងទិញសំបុត្រតម្លៃ១៥យូរ៉ូយើង

# លាហើយប៉ារីស







អាចជិះរថភ្លើងជិះមេត្រូជិះរថយន្តបើសក្នុងរយៈពេញមួយថ្ងៃដោយគ្មានចេញលុយអ្វីបន្ថែមឡើយ ។ ក្រុងប៉ារីសផ្តល់នូវជំនិះទំនើបនិងប្រសិទ្ធភាពបំផុតដល់ប្រជាពលរដ្ឋនៅទីនោះគេជ្រើសរើសប្រើឡានខ្លួនឯងប្រសើរជាង ។

វិធីបីយ៉ាង សំរាប់ឡើងទៅកំពូលភ្នំម៉ុងម៉ាត (Montmatre) គឺឡើងថ្មើរជើងតាមជណ្តើរធំទូលាយមួយត្រង់ទៅរកវិហារសាក្រេកឺតែម្តង -ទន្ទឹមគ្នានោះមានរថត្រាំវ៉ៃ (Tramway) ដែលដឹកអ្នកដំណើរឡើងត្រង់៥នាទីម្តងសំដៅទៅកំពូលភ្នំ ហើយនិងច្រកឡើងតាមរថយន្តតូចធំបានបត់បែនតាមជំរាលភ្នំរហូតដល់លើ ។ នៅតាមបណ្តោយផ្លូវពាណិជ្ជករលក់វត្ថុអនុស្សាវរីយ៍កកកុញធ្វើឱ្យភ្ញៀវឈប់មើលផលិតផលប្រណិតៗរបស់ខ្លួនធ្វើឱ្យចរាចរគាំងស្ទះច្រើនដងរាល់ថ្ងៃ ។



នៅលើកំពូលភ្នំម៉ុងម៉ាតនាថ្ងៃទី១៧នោះមេឃស្រឡះមានថ្ងៃចាំងធ្វើឱ្យរមណីយដ្ឋានមានសម្ផស្សត្រកាល ។ យើងឈរលើកំពូលភ្នំហាក់ដូចជាឃើញក្រុងប៉ារីសទាំងមូលនៅក្រោមបាតជើងទេសចរគ្រប់ៗគ្នាធ្វើឱ្យទំហំនៃទស្សនីយភាពមើលឃើញនៅទីនោះមានភាពអស្ចារ្យអាចចង្អុលបង្ហាញអ្នកដទៃនូវគ្រប់រមនីយដ្ឋានដែលយើងបានទៅរួចហើយ ដូចជា "ទូរអំហ្វែល"-ក្លោងទ្វារអេត្វាល -ប៉ុងតេអុង -បង្គោលបាស្ទីយ ឬរ៉េពុយប្លីក...។ល។ នៅជុំវិញយើង មិនត្រឹមតែមានទេសចរប្លែកៗគ្នាក្នុងសំលៀកបំពាក់ប្រពៃណីខុសៗគ្នានិយាយភាសាខុសគ្នាអ៊ូអែគេឃើញមានសិល្បករដូរតន្ត្រី សិល្បកររបាំហិបហុប សិល្បករ ល្ខោន



តទៅទំព័រទី ២៥

# ម្ចាស់បទ អាល័យក្លិនអូន លោកហួឡាវី

ដោយ : សុខា

**ក្រុងឡូវែល :** តារាជើងចាស់អាយុ៦៧ឆ្នាំ នៅតែល្បីល្បាញក្នុងវិស័យសិល្បៈ លោកហួរ ឡាវី បានអញ្ជើញមកសម្តែងនៅសហរដ្ឋអាមេរិក នៅចុងខែតុលា ឆ្នាំ២០១៣ ក្នុងភោជនីយដ្ឋានសំពៅមាស។ ប្រិយមិត្ត និងទស្សនិកជនប្រាដក ជាជ្រាបបទចម្រៀងអាល័យក្លិនអូន អាណៃត មាសបង សែនអាល័យ និងដងស្ទឹងស្រែខ្លុង សុទ្ធសឹងជាបទចម្រៀងដែលលោកហួ ឡាវី និពន្ធ និងច្រៀងខ្លួនឯង ហើយទទួលបានការគាំទ្រយ៉ាងពេញទំហឹងពីសាធារណជន។


លោក ហួរ ឡាវី សម្តែងនៅសហរដ្ឋអា
ខែតុលា ឆ្នាំ២០១៣ នៅភោជនីយដ្ឋានសំពៅ

លោក ហួ ឡាវី មានទីកន្លែងកំណើតនៅស្រុកកំពង់សៀម ខេត្តកំពង់ចាម។ ឪពុកនាម ហួ លីលាន និងអ្នកម្តាយនាម ខោល សាន សុទ្ធតែជាកសិករ។ លោកបានរៀបការជាមួយអ្នកគំនូរម្នាក់ ឈ្មោះទូន សុផារី នៅឆ្នាំ១៩៩០ មានកូន៧នាក់ ប្រុស៣ និងស្រី៤នាក់។ ក្នុងចំណោមកូនទាំង៧ កូនទីប្រាំ និងទីប្រាំមួយ ឈ្មោះឪណា និងឪណែត មាននិស្ស័យមកខាងសិល្បៈ។

តារាចម្រៀងពូកែលើកដាក់សម្លេងឯករូបនេះ ចាប់ផ្តើមច្រៀងចម្រៀងតាមខេត្ត នៅកំពង់ចាម ឆ្នាំ១៩៦៣។ លុះដល់ឆ្នាំ១៩៧០ លោកឡើងមកភ្នំពេញ ហើយឆ្នាំ១៩៧១ ប្តូរទៅប៉ៃលិន។ បច្ចុប្បន្នលោក ហួ ឡាវីជាអ្នកចម្រៀងប្រចាំភោជនីយដ្ឋានផ្ទះម៉ែក្មេក និងទទួលច្រៀងតាមការប្រគុំតន្ត្រី (Concert) នានាជារឿយ ព្រមទាំងចេញមកសម្តែងក្រៅប្រទេសតាមប្រទេសនានា ដូចជា បារាំង អូស្ត្រាលី កាណាដា អាមេរិកជាដើម។


លោក ប៊ុន សាក់ និង កែវ វាសនា កូនសិស្សរបស់ លោក ហួ ឡាវី

គ្រូបាអាចារ្យខាងសិល្បៈដែលបង្ហាត់បង្រៀនលោកកន្លងមករួមមាន គ្រូអ៊ឹង ណារី តូច តេង ជា សាវឿន និង ឌុច គីមហាក់។ លោកហួ ឡាវី មាននិស្ស័យ និងយកលោកតា ស៊ិន ស៊ីសាមុត ជានិមិត្តរូបរបស់លោក។ ពោលពីកូនសិស្សចម្រៀងបង្រៀនដោយលោក ហើយដែលអ្នកទាំងនោះក្លាយទៅជាអ្នកចម្រៀងពេញសិទ្ធក្នុងព្រះរាជាណាចក្រកម្ពុជា និងទទួលបានការគាំទ្រច្រើនពីសាធារណជនរួមមានអ្នកចម្រៀង ប៊ុន ស័ក្តិ និង កែវ វាសនា ដែលបច្ចុប្បន្នជាតារាចម្រៀងប្រចាំផលិតកម្មសាន់ដេ៕

តមកពីទំព័រទី ១

## វត្តត្រៃរតនារាម : សំណាងរូបរួមគ្នាតែមួយ...

មានអាជ្ញាប័ណ្ណតែមួយធ្វើតាក់តែមួយ តែម្ចាស់វត្តជាគណៈកម្មការបានបែងចែកអំណាចជាវត្តពីតាំងតែពីជាង១០ឆ្នាំមកហើយ ហើយនៅពេលជាង១០ឆ្នាំនោះ វត្តលើវត្តក្រោមនោះមានទំនាស់គ្នាទៅតុលាការទាមទាររកម្ចាស់នៃវត្តអារាមនេះ រហូតដល់លោកគ្រូចៅ អធិការ សៅ ឃន ត្រូវខ្ចាតចេញទៅរកវត្តថ្មីកាលពីពាឆ្នាំមុន។ ទោះជាចេញទៅហើយក្តី ទំនាស់វត្តលើវត្តក្រោមនៅបន្តតែដដែល ។

កាលពីរដូវក្តៅមុននោះ ចរន្តព័តិមានមួយចេញពីមាត់នៃគណៈកម្មការទាំងសងខាងថានឹងមានការបង្រួបបង្រួមវត្តត្រៃរតនារាមទាំងពីរនេះឱ្យទៅជាមួយមកវិញ ពាក្យទាំងនេះគ្រាន់តែជា"ផ្លែព្រួស"តែប៉ុណ្ណោះតែរទេះសេះនៃការបែកព្រាត់ប្រាស់គ្នានោះចេះតែទៅឆ្ងាយទៅហើយ ពីព្រោះគ្មានទំនាក់ទំនងជាភាតរភាពជាគ្រួសារតែមួយ រកគ្នារវាងបក្សទាំងពីរនេះទាល់តែសោះ ហើយក៏គ្មានសារណាមួយដែលជាឱវាទដ៏ប្រពៃរបស់ព្រះសម្មាសម្ពុទ្ធបានបញ្ចូលទៅរំងាប់ទុក្ខដល់ប្រជាពរដ្ឋក្រុងឡូវែលម្តងណាឡើយ ។ ដោយសារការបន្តបែងចែកវត្តដែលមិនគួរធ្វើនេះ ធ្វើឱ្យព្រះសង្ឃ និងគណៈកម្មការវត្ត ពុំអាចបំពេញតួនាទីជាចម្បងរបស់វត្តអារាមបានតាមបំណងបានឡើយ បើម្ខាងខំធ្វើល្អរបៀបណាក៏ម្ខាងទៀតរកកំហុសឱ្យទាល់តែឃើញ សារនៃអំពើល្អក្តីបានក្លាយទៅជាសារនៃការបែកបាក់ជាអំពើគ្មានការអត់ឱន និងជាអំពើបាបជាស្វ័យប្រវត្តិនៅចុងបញ្ចប់ ។ តើអ្វីដែលដឹកនាំវត្តទាំងពីរឱ្យធ្លាក់ទៅដល់ការប្រឹងប្រែងដណ្តើមយកឈ្នះគ្នាយ៉ាងមុះមុតយ៉ាងនេះ បើអ្នកទាំងពីរនោះពុំមានផលប្រយោជន៏អ្វីសម្រាប់ខ្លួនឯងទេនោះ?

ការស្វែងរកចុះសម្រុងគ្នារវាងគណៈកម្មការវត្តលើវត្តក្រោមមិនអាចប្រព្រឹត្តទៅបាន ដោយអ្នកទាំងពីរដើរតួជាម្ចាស់ដាច់ថ្លៃនៃវត្តនិមួយៗ វត្តគឺជាជ័យភណ្ឌដែលក្រុមអញបានច្បាំងឈ្នះគ្រប់គ្រងសម្បត្តិតាមច្បាប់ "ចោរសមុទ្រ" ដែលខុសគ្នាពីច្បាប់នៃរបប"ប្រជាធិបតេយ្យ" ឬ "ធម្មាធិបតេយ្យ" នាំគ្នាយកសេចក្តីសម្រេចរបស់ចៅក្រមទៅវាយតម្លៃធ្វើតាមតែភាគណាដែលផ្តល់ចំណេញដល់ការ "បែកបាក់" គ្នាជាធំ រួចភូតភរមហាជនដែលជាម្ចាស់ទុនគ្មានខ្វល់ខ្វាយ និងភាពសុច្ចរិតឡើយ ។ "គណៈកម្មការវប្បធមិខ្មែរ" (គកវខ)



Meas Sem & Kem Chantha

បានចាប់កំណើតឡើង ដំណាងឱ្យម្ចាស់ទុនដែលធ្លាប់តែគ្មានសំលេង ឥឡូវចេញមុខមកការពារវត្តអារាមដែលគេយល់ថា កំពុងតែប្រឡាក់ប្រឡូសដោយអបាយមុខយ៉ាងចេញមុខ ។ យើងបានជួបដំណាង "គកវខ" គឺលោក ភិម ចាន់ថា ជាសិល្បករគំនូរ និងលោក សែម មាស ដែលជាអ្នកសេដ្ឋកិច្ច និងនយោបាយកាលពីថ្ងៃ១៩កន្លងទៅ ដែល២ឆ្នាំចុងក្រោយនេះបានត្រូវទទួលភារៈដឹកនាំចលនាមហាជនប្រឆាំង និងទង្វើ "អគតិ" ក្នុងវត្ត ជាពិសេសណែនាំឱ្យបញ្ចូលវត្តត្រៃរតនារាមលើ-ក្រោមមកឱ្យនៅតែមួយវិញ។ ប្រជាពលរដ្ឋនៅឡូវែលនេះបានបញ្ចេញយោបល់ជាសាធារណៈដំណើរ និងមិនទុកចិត្តគ្នារឹតតែខ្លាំង" អ្នកទាំងពីរបន្តទៀតថា "វត្តលើចោទថា មានចោរលួចលុយវត្តក្រោម ហើយនៅតែសហការណ៍ជាមួយចោរ" អ្នកទាំងពីរទទួលស្គាល់ថា ទង្វើយកលុយមិនប្រាប់មុន ជាអំពើខុស តែចៅអធិការវត្តក្រោមបានដោះស្រាយរួចហើយ"ការនេះមិនរំខានដល់ការរួបរួមគ្នាទេ" ចំពោះទង្វើនេះ ភិម ចាន់ថា បន្តថា "ខាងលើលាបពណិថា ក្រុមយើងជាពួកខាងក្រោមមិនត្រូវមកលូកដៃដោះស្រាយការបង្រួបបង្រួមវត្តត្រៃរតនារាមទេ" ។

ខាងក្រោមថា "គេបិទវត្ត ព្រោះធ្វើការជួសជុលគ្មានច្បាប់"ខាងលើថា "គេបិទវត្តព្រោះ




ថា "ការបែកវត្តជាពីរនេះ គឺជាដំបៅដ៏ឈឺចាប់របស់សង្គមខ្មែរ"ពួកគាត់មានការទុកចិត្តឱ្យ "គកវខ" រកយុត្តិធមិឱ្យខ្លួន។

មកទល់នឹងពេលនេះ"គកវខ"នៅក្មេងខ្ចីប្រើវិធីអង្វរករចែចូវឱ្យអ្នកទាំងពីរខាង មានការប្រាស្រ័យទាក់ទងគ្នាឱ្យបានល្អ ដើម្បីឱ្យប្រជាពលរដ្ឋអាចទៅធ្វើបុណ្យបាន តែទាំង ភិម ចាន់ថា និង សែម មាស និយាយថា "ការនិយាយមិនទៀងរបស់វត្តខាងលើ ធ្វើឱ្យការចរចារគ្នាតាំងមានមនុស្សដេកក្នុងវត្តដែលគេហាមឃាត់ "គឺគ្មានបំណងនិយាយពាក្យពិរោះដាក់គ្នា ពេលរៀបជិតស្លាប់ទៅហើយទេ នៅមានទៀត គឺលោកវត្តក្រោមនៅតែមិនអាចមកគង់នៅកុដិដែលគេមិនបិទ បានដដែល នៅមានបំណងដាក់កុងទ័រភ្លើងដាច់គ្នា ធ្វើការជួសជុលបន្តដាច់គ្នា គឺជាសញ្ញានៃការបែកបាក់គ្នាជាប្រាកដពុំដូចពាក្យចចាមអារាមថា វត្តនេះនឹងចូលរួមគ្នាតែមួយនោះទេ៕ **ដោយៈ ពិន សំខុន**

# ក្រុមរបាំអង្គរបង្ហាញពីការវិវត្តនៃកម្រងខ្សែភាពយន្តរបាំខ្មែរ

**អត្ថបទដោយ ចេម អសទីស**

**ប្រែសម្រួលដោយ : សុខា**

**ក្រុងឡូវែល:** របាំបុរាណខ្មែរមានវ័យចំណាស់ឆ្លងកាត់ច្រើនសម័យកាល ហើយក្នុងកាលៈទេសៈតានតឹងមួយនាអតីតកាលរបាំនេះស្ទើរប្រឈមនឹងការបាត់បង់។ យ៉ាងណាមិញតម្លៃដ៏ខ្ពង់ខ្ពស់ និងកម្លាំងចលករថែរក្សារបាំនេះនៃអនុជន និងបច្ឆាជនខ្មែរបានបន្តអតិភាពរបាំបុរាណខ្មែររហូតមកដល់សព្វថ្ងៃ ។ របាំបុរាណខ្មែរបានក្លាយជាសម្បត្តិទាក់ទាញមនុស្សជំនាន់ក្រោយធ្វើការគាំទ្រមរតកនេះបានកាន់តែច្រើនឡើងមានជាអាទិ៍ដូចជាការបង្កើតកម្មវិធីបញ្ចាំងកម្រងខ្សែភាពយន្តរបាំបុរាណខ្មែរតួយ៉ាងរបាំព្រះរាជទ្រព្យដែលត្រូវបានបន្តរក្សាដោយសម្តេចព្រះរាមបុប្ផាទេវី និងរបាំបុរាណដទៃទៀត ដូចជារបាំស្វាជាដើម។


James Ostis
ចេមស៍ អសទីស

ថ្ងៃទី១៩ វិច្ឆិកា ឆ្នាំ ២០១៣ បន្ទាប់ពីមានការបញ្ចាំងកម្រងភាពយន្ត ហើយក្រុមរបាំអង្គរក្នុងរដ្ឋម៉ាសាឈូសេត ក្រុងឡូវែល ដែលមានលោក ធីម ធូ ជាស្ថាបនិកបានបង្ហាញទស្សនីយភាពរបាំបុរាណជាតឹកតាងនៃឯកសារភាពយន្តរបាំបុរាណឆ្នាំ១៩៦៥។ កម្មវិធីនារាត្រីនោះប្រព្រឹត្តទៅនៅសួនប្រវត្តិសាស្ត្រជាតិឡូវែលក្នុងមជ្ឈមណ្ឌលសម្រាប់អ្នកធ្វើទស្សនកិច្ចហៅកាត់ថា អិល អិន អេច ភី វីស៊ីតធ័សិនធ័ (LNHP Visitor's Center) ។


Monica Veth, Brianna Mai
photo credit-Sovanna Pouv

ថ្ងៃទី១៨ មិនា ផលិកម្មឡូវែលបេសហ្វាយយីងអបស័នឹងបញ្ចាំងកុនថ្មីបង្ហាញរបាំបុរាណខ្មែរក្នុងទម្រង់ថ្មីនៃសតវត្សទី២១ ហើយបើកជូនដល់សាធារជនបានចូលទស្សនាក្រោម

**តទៅទំព័រទី១១**

# Angkor Dance Troupe presents the Evolution of Cambodian Dance Film Series

**By James Ostis**

It is an art form over a thousand years old that continues to engage and captivate audiences; both steeped in ancient tradition and the inspiration for contemporary artistic innovation. Tragically almost lost forever, the evolution of Cambodian classical dance has been a fascinating journey; one Lowell's Angkor Dance Troupe is sharing through the power of film.

On November 19, Angkor Dance Troupe kicked off their Evolution of Cambodian Dance Film Series with the presentation of the 1965 documentary The Royal Ballet of Cambodia. The film traces the roots of Cambodian dance tradition from its origins in antiquity to its practices of the mid-20th century. The movie features both performances and behind the scenes activities of what it describes as "a unique contribution to the world's culture." Princess Bupphadevi makes a special **Continued to page 11**


Angkor Dance Troupe, photo credit - Sovanna Pouv

*Continued to page 08*

# Thanksgiving History...

colonists perished that winter from disease or starvation.

In the spring, the indigenous people (formerly known as Indians or Native Americans) taught the colonists (also known as the Pilgrims) how to grow corn and other native crops. In the fall of 1621, the colonists held a banquet for themselves and the indigenous people to give thanks for their plentiful harvest. This was the first Thanks giving.

The tradition of giving thanks for the fall harvest continued but Thanksgiving did not become an official holiday until 1863 at the height of the American Civil War. President Abraham Lincoln proclaimed that all Americans should set aside the last Thursday in November as a day of thanksgiving.

Today, Thanksgiving is one of America's most popular holidays. The day before is the busiest travel day of the year as families reunite for the holiday. That Wednesday night has also become a time for partying, a tradition that started with college students who came home for the holiday socializing with their friends from high school. Many others copied this custom and the day is sometimes known as "Blackout Wednesday" for all the drinking that occurs.

Thanksgiving day begins with high school football. The game between Lowell High and Lawrence High used to attract thousands of spectators. After years of declining interest, the game is again quite popular but Thanksgiving is mostly about families and food with a typical menu consisting of roast turkey, mashed potatoes, sweet potatoes, squash, corn, cranberry sauce and pumpkin pie.

In recent years, the day after Thanksgiving has become a busy shopping day that is the start of the Christmas season. That day is called Black Friday because the sales made that day often provide merchants with their first profit of the year. (In accounting, debts are written in red pencil and profits in black pencil so when a company has a profit, it is said to be "in the black" which is where the name Black Friday came from). Internet companies offer sales on the Monday after Thanksgiving. That day is now known as Cyber Monday.

Despite the commercialization of the holiday as the start of the Christmas shopping season, Thanksgiving remains mostly about family, friends and giving thanks for life's good fortunes.

តមកពីទំព័រទី ១

# ប្រវត្តិ និងទម្លាប់បុណ្យ...

អង់គ្លេសដំបូងបង្អស់មកដល់ដែនដីថ្មីនាឆ្នាំ ១៦២០ បន្ទាប់ពីឆ្លងសមុទ្រអាត់ឡង់ទិកដ៏ធំធេងមកដល់ផ្តើមរស់ដោយការស្រេកឃ្លាន ព្រោះគ្មានម្ហូបអាហារគ្រប់គ្រាន់តែជនជាតិដើមម្ចាស់ស្រុកបានជួយផ្តល់ម្ហូបអាហារជួយបង្រៀនឱ្យដាំដំណាំបន្ទាប់មកទទួលផលផ្លែផ្កាបរិបូរណ៍ ។ នៅរដូវក្តៅបន្ទាប់មកគេនាំគ្នាធ្វើបុណ្យដើម្បីថ្លែងអំណរគុណដ៏ស្មោះស្ម័គ្រដល់ក្រុមម្ចាស់ស្រុក ហើយបុណ្យនេះក៏ក្លាយជាទម្លាប់បុណ្យប្រចាំតាំងពីពេលនោះមក។ បុណ្យនេះបានក្លាយជាបុណ្យជាតិឆ្នាំ១៨៦៣ គឺ២០០ឆ្នាំ ក្រោយមកនៅពេល ដែលប្រធានាធិបតី "អាប្រាហាមលីនកិន"ឡើងកាន់ដំណែង ហើយប្រារព្ធពិធីនេះនៅថ្ងៃព្រហស្បតិ៍ ចុងក្រោយនៃខែវិច្ឆិកាឱ្យឈ្មោះថា "ថេងគ្គីវីង" ជាផ្លូវការ ។

*សូមអានអត្ថបទ "រីកឆាត ហារ" ជាភាសា អង់គ្លេសជាបន្តទៅទៀត :*

# Service Rewarded

**Posted on November 20, 2013**
**By Jennifer Myers, Mayor's Aid**
**Photo Courtesy by City Hall Official Blog "Room 50"**

In 1963, 17-year-old Al Buckley dropped out of Lowell High School to join the U.S. Navy.



Wednesday night, 50 years later, he received his high school diploma.

Under Massachusetts state law, school committees have the authority to issue high school diplomas to honorably discharged veterans who fought in World War II, the Korean or Vietnam Wars, who joined the Armed Forces prior to completing their high school graduation requirements.

This summer, following years of thinking about it, Mr. Buckley petitioned Mayor Patrick Murphy, requesting his diploma.

He was awarded his diploma by Mayor Patrick Murphy, Superintendent of Schools Jean Franco and Lowell High School Headmaster Brian Martin at Wednesday night's School Committee meeting.

Mr. Buckley, 67, grew up on a farm in Dunstable (when kids from Tyngsboro and Dunstable attended Lowell High School). He served in the U.S. Navy from 1963 to 1970, including two tours in Vietnam. He served aboard the USS Buchanan and earned the National Defense Service Medal and the Vietnam Service Medal with one Bronze Star.



អេស ប៊្យូខេណុន (USS Buchannon)



He has lived in Pepperell since 1976 and is a plumbing and heating contractor. He and his wife, Susan, have raised eight sons; the youngest, Nathan, served two tours in Iraq as a member of the U.S. Army.

Mr. Buckley has been an active member of his community, having served on the Pepperell Conservation Commission and Board of Health and has served on the Nashoba Valley Technical High School Committee for two decades.

# ទទួលរង្វាន់ក្នុងបុព្វហេតុការពារជាតិ

**អត្ថបទដោយ : ចេនីហ្វឺ មីយឺរ**
**ប្រែសម្រួលសង្ខេបដោយ : សុខា**

យោងតាមច្បាប់រដ្ឋម៉ាសាឈូសេត គណៈកម្មការនាយកសាលាអាចផ្តល់សញ្ញាប័ត្រឌីប្លូម៉ាជូនដល់យុទ្ធជនដែលបានច្បាំងដើម្បីបុព្វហេតុជាតិក្នុងសង្គ្រាមលោកលើកទី២ សង្គ្រាមវៀតណាម ឬសង្គ្រាមកូរ៉េ ខណៈដែលយុទ្ធជនទាំងអស់នោះមិនទាន់បញ្ចប់ការសិក្សាពីវិទ្យាល័យ ។ ជាក់ស្តែង លោក បឹកលីយ៍ (Buckley) អតីតយុទ្ធជនដែលបានចូលរួមក្នុងនាវិកកាលពីឆ្នាំ១៩៦៣ នៅអាយុ១៧ឆ្នាំទាំងមិនទាន់បញ្ចប់វិទ្យាល័យ ។ យ៉ាងណាមិញ៥០ឆ្នាំក្រោយមក ពោលគឺរាត្រីនៃថ្ងៃពុធសប្តាហ៍ទីបីនៃខែវិច្ឆិកា ឆ្នាំ២០១៣ លោកបានទទួលសញ្ញាប័ត្រឌីប្លូម៉ាពីអភិបាលក្រុងផាទ្រីក មីហ្វី ប្រធានសាលា ជីន ហ្វ្រាន់ស្កូ និងនាយកសាលា ប្រាយអិន ម៉ារទីន ។



ទទួលសញ្ញាប័ត្រឌីប្លូមមា (Buckley)

បច្ចុប្បន្ន លោកបឹកលីយ៍(Buckley) អាយុ៦៧ឆ្នាំ មានភរិយឈ្មោះស៊ូសាន និងមានកូនប្រុស៨នាក់ ហើយមានកូនប្រុសពៅចូលបម្រើទ័ពក្នុងទាហានអាមេរិកដែលមានបេសកកម្មនៅប្រទេសអ៊ីរ៉ាក់ ៕

តមកទំព័រទី ១

## រីកឆាត ហាវ ឪពុកផ្តល់ឈ្មោះ...

គ្រប់គ្រងតែ រីកឆាត ហាវ បានទៅបញ្ចុះបញ្ចូលចៅក្រមឱ្យទុកពេលឱ្យខ្លួនរៀបចំផែនការណ៍សម្រាប់ទុកសាលាក្នុងតំបន់ឱ្យនៅក្រោមការគ្រប់គ្រងរបស់តំបន់វិញ។ ក្រោមការដឹកនាំជាក្រុមការងារក្រុងឡូវែលក៏ធ្វើការបានសម្រេចបង្កើតសាលារៀនថ្មីចំនួន១០ទៀត ជាសម្បត្តិនៃការដឹកនាំរបស់ក្រុង ហើយជួយដល់ក្រុមអន្តោប្រវេសន៍ មានកន្លែងឱ្យកូនចៅចូលរៀនបានគ្រប់គ្នា។

ស្ពាន ដ៏មានន័យ ភ្ជាប់ក្រុងទៅនឹងតំបន់ មហាវិទ្យាល័យធំ បានធ្វើឱ្យគ្រួសារ ហាវ មានមោទនភាពដោយឃើញឈ្មោះគ្រួសារក្លាយជាអមតៈ ជាកិត្តិយសដែលបានមកពីការប្រឹងប្រែងគ្មានឈប់ ដើម្បីអភិវឌ្ឍន៍សង្គមអាមេរិកាំងឱ្យរីតតែប្រសើរជានិច្ច។

សូមអញ្ជើញអានអត្ថបទ ផែននិហៀ ម៉េឃី ពីបន្ទាប់លេខ ៥០ និងអត្ថបទ រីកឆាត ហាក ជាកូនដែលផ្សាយក្នុងវេបសាយ :

*Continued From Page 1*

## New Bridge Dedicated to...

first baseman. He was then drafted into the Army. Following his service, Howe taught in Billerica and in Lowell and earned his law degree from Suffolk University.




In 1965, he was elected to the Lowell City Council, where he remained for 40 years, deciding to retire at the end of 2005. Howe served as Mayor in the 1970-71,

1988-89, 1990-91 and 1994-95 terms.

UMass Lowell Chancellor Marty Meehan pointed out that to Richard Howe, being Mayor of Lowell was never just ceremonial.

In 1987, when the federal government was threatening to take over the city's schools, Howe convinced the judge to give him time to pull together a plan. He put together a team that led to the building of 10 new schools in the city and kept the district out of the clutches of the feds.

Meehan and City Manager Bernie Lynch talked about what a crucial project the new bridge is for both the university



and the city, connecting North Campus with East Campus and the upper Merrimack Street corridor, a connection that will increase economic development activity and continue the revitalization of upper Merrimack Street.

"Dick Howe Sr. served the city with distinction, with integrity," said Lynch. "His contributions have made the city what it is today."

## Bridge dedication wrap-up

**Posted on November 20, 2013 by DickH Richard Howe)**


Richard Howe Jr.

Thank you to everyone who helped make yesterday such a special occasion for my mom and dad and the entire Howe Family. From those who organized the event to those who endured the chilly wind by attending the ceremony, you have our enduring gratitude. And it was a wonderful ceremony held atop a structure that will soon be the place to stand for some of the most picturesque views in the city.

My sister Martha Howe spoke on behalf of our dad. Here are the remarks she made during the dedication:

I am honored to speak for my father and family on this momentous occasion of the opening of the Richard P. Howe Bridge.

- My father's chief political strategist and wife of 56 years Mary Howe.
- My brothers Richard Howe Jr (and Roxane) and Peter Howe and his wife Roseanne.
- 4 of his 6 grandchildren are here - Peter Jr., Kimberley, Emily and Rachel Howe. Eric and Andrew Howe were not able to make it. .
- His sisters Kathy Navetta and Carol Collins
- Extended family, friends and the large contingent of lawyers from the Greater Lowell Bar. For 40 years my father forged pathways

over obstacles and his actions had historic implications for this City from the Arena, Ballpark, Settlement of Federal lawsuit that resulted in funding for 14 new schools. He believed politics was a noble profession. He spoke for people who had

no voice. He challenged issues that needed to be challenged, even if it was not the popular stand. He never worried about the opposition in fact he welcomed confrontation and debate. He admitted to me

*Continued to Page 11*

*Continued From Page 10*
## Bridge Dedicated to...

the other day that it never came to fisticuffs, but as many of you know it came close a few times.

His fighting spirit and innate abilities transferred to and benefited every other aspect of his life including his work as a Trial Lawyer and his dedication to his family who are so very proud of him and so very honored to be here today. Thank you.


The Howe's Family

**At Tuesday's ceremony, Mayor Patrick Murphy presented the following citation:**

## CITATION

**Be it hereby known to all that the City of Lowell in the Commonwealth of Massachusetts is pleased to honor former Mayor Richard P. Howe Sr. upon the dedication of the**

**RICHARD P. HOWE SR. BRIDGE**

***in recognition of his outstanding service and dedication to the city of Lowell, having served 40 years on the City Council, including four terms as Mayor.***

***In his January 1970 Inaugural Address, Mayor Howe stated: "The challenge confronting each of us today is to return Lowell to its former position as a leader; to re-establish this city as one with a future and not just a past."***

***A leader known for his integrity, the contributions of Richard P. Howe Sr. over more than four decades, were integral to bringing the city to where it is today - back to its position as a leader among mid-sized cities. Never afraid to speak his mind regardless of the consequences, Mayor Howe always firmly stood by what he believed was in the best interest of the city and of all Lowellians.***

***The entire City of Lowell is proud to honor Richard P. Howe Sr., for his service.***

***Given this 19th day of November, 2013.***

**Patrick Ó. Murphy**
**Mayor**
**Joseph Mendonca**
**Vice Chair**
**Rodney M. Elliott**
**Edward J. Kennedy, Jr.**
**John J. Leahy**
**Martin E. Lorrey**
**William F. Martin, Jr.**
**Rita M. Mercier**
**Vesna E. Nuon**


តមកពីទំព័រទី ៧
## ក្រុមរបាំអង្គរបង្ហាញពីការវិវត្តនៃ...

ការសហការឧបត្ថម្ភពីសួនប្រវត្តិសាស្ត្រជាតិឡូវែល មជ្ឈមណ្ឌលឧស្សាហកម្មប្រវត្តិសាស្ត្រសុងហ្គាស ក្រុមប្រឹក្សាវប្បធម៌រដ្ឋម៉ាសាឈូសេត និងសាជីវកម្មកុនឡូវែល ។

គួរបញ្ជាក់ផងដែរ បេសកកម្មក្រុមរបាំអង្គរ គឺផ្សារភ្ជាប់សហគមន៍តាមរយៈការអភិរក្ស អប់រំ និងគំនិតច្នៃប្រឌិត ក្នុងការសម្តែងសិល្បៈខ្មែរ ។ ក្រុមរបាំអង្គរនឹងការធ្វើការរៀបចំការប្រជុំជាសាធារណៈនៅថ្ងៃអាទិត្យ ទី៨ ខែធ្នូ ចាប់ពីម៉ោង ២និង៣០នាទីរសៀលទៅម៉ោង៤នៅមជ្ឈមណ្ឌលវប្បធម៌ផាទ្រីក ចេ ម៉ូហ្គេន (Patrick J. Mogan Cultural Center) អាស័យដ្ឋាន(40 French Street, Lowell, MA) ។ ព័ត៌មានបន្ថែមសូមចូលកាន់គេហទំព័រ www.angkordance.org.



*Continued from page 07*
## Angkor Dance Troupe presents...

appearance performing the Apsara Dance at the film's conclusion. The moviewas followed by a live performance by the Angkor Dance Troupe at the Lowell National Historical Park Visitor's Center.


Tim Thou

Tim Thou, founder of Angkor Dance Troupe, dedicated the film screening to his grandmother, Katna Poeu noting, "She was the driving force to my commitment to preserve the traditional arts of Cambodia." During the post-performance discussion, the dancers reflected on their experiences, all expressing the deep honor they felt at the opportunity to perform the traditional arts of their ancestors.

While the first film examined Cambodian dance from its beginning, the next two movies in the series have a more modern and local focus. The series continues on January 21 with TheMonkey Dance, a 2002 documentary following three teenage Angkor Dance Troupe members as they come of age in Lowell. On March 18, the Lowell-based Flying Orbs Productions will present a new film utilizing the traditional dance forms in modern artistic expression. All of the films will be hosted at the LNHP Visitor's Center (246 Market St, Lowell) and will be free and open to the public. The Evolution of Cambodian Dance Film Series is co-sponsored by Lowell National Historical Park, Tsongas Industrial History Center, Massachusetts Cultural Council, and the Lowell Film Collaborative.

The mission of the Angkor Dance Troupe is to connect communities through the preservation, education and innovation of Cambodian Performing Arts. The troupe will be hosting its Annual Public Meeting on Sunday, December 8 from 2:30 to 4:00 at the Patrick J. Mogan Cultural Center, 40 French St, Lowell, MA. For more information, please visit: www.angkor-dance.org

តមកពីទំព័រទី ១៣

## អាជ្ញាធរយកបទបញ្ជាធំជាងច្បាប់...

ការស្លាប់របស់អ្នកស្រី អេង សុខុម ប៉ុណ្ណោះទេ ប៉ុន្តែក៏បង្ហាញថា ការប្រើកម្លាំងបែបនេះផ្ទុយពីដំណោះស្រាយដោយសន្តិវិធីរបស់ខ្លួន ចំពោះការជួបជុំគ្នាធំៗផ្សេងទៀតកាលពីពេលកន្លងមកដែរ។

លោកបានមានប្រសាសន៍ថា ការដើរក្បួននៅក្នុងរាជធានីភ្នំពេញរយៈពេលបីថ្ងៃរបស់គណបក្សសង្គ្រោះជាតិ កាលពីខែមុនដែលពេលនោះនគរបាលបានដកខ្លួនចេញ និងមានការគោរពតាមបទបញ្ជាដោយផ្ទាល់របស់លោក ស ខេង រដ្ឋមន្ត្រីក្រសួងមហាផ្ទៃនោះ បានបង្ហាញពីកម្រិតនៃការត្រួតត្រារបស់រដ្ឋាភិបាលទៅលើកងកម្លាំងប្រដាប់អាវុធ។ លោក កែម ឡី បានមានប្រសាសន៍ថា "អ្វីៗគ្រប់យ៉ាងស្ថិតនៅក្រោមការត្រួតត្រាដ៏តឹងរ៉ឹងពីរដ្ឋាភិបាលដូចជានគរបាលកងរាជអាវុធហត្ថ និងគោលដៅដែលពួកគេត្រូវបំពេញការងារឱ្យនៅក្នុងការដោះស្រាយជាមួយអ្នកតវ៉ា។ នេះជាការទទួលខុសត្រូវរបស់រដ្ឋាភិបាល"។

លោកបានបន្ថែមថា ប្រសិនបើរដ្ឋាភិបាលនៅតែបដិសេធថា ការបាញ់ស្លាប់មនុស្សនៅកន្លែងតវ៉ាក្នុងខណ្ឌមានជ័យនេះ មិនមែនជាការទទួលខុសត្រូវរបស់រដ្ឋាភិបាលនោះ រដ្ឋាភិបាលគួរតែធ្វើការស៊ើបអង្កេតឱ្យបានច្បាស់លាស់ដើម្បីយកអ្នកទទួលខុសត្រូវមកផ្តន្ទាទោសតាមច្បាប់។ លោក កែម ឡី មានប្រសាសន៍ថា "រដ្ឋាភិបាលត្រូវតែនាំខ្លួននគរបាលដែលទទួលខុសត្រូវឡើងតុលាការ ប្រសិនបើពួកគេចង់បដិសេធមិនទទួលខុសត្រូវចំពោះរឿងនេះ បើមិនដូច្នោះទេ រដ្ឋាភិបាលជាអ្នកទទួលខុសត្រូវចំពោះរឿងនេះ"។

មាត្រា៥១ នៃច្បាប់ស្តីពីសហលក្ខខន្តិកៈមន្ត្រីរាជការស៊ីវិលចែងថា ក្នុងករណីដែលមន្ត្រីរាជការណាម្នាក់ប្រព្រឹត្តបទល្មើសព្រហ្មទណ្ឌ ហើយត្រូវបានព្រះរាជអាជ្ញាសម្រេចធ្វើការចោទប្រកាន់ ព្រះរាជអាជ្ញាត្រូវជូនដំណឹងអំពីការចោទប្រកាន់នោះទៅប្រធានស្ថាប័នសាមី។

លោក ហ៊ី ព្រូ ស្នងការរងនគរបាលរាជធានីដែលកំពុងដឹកនាំការស៊ើបអង្កេតលើការបាញ់ស្លាប់អ្នកស្រី អេង សុខុម បដិសេធមិនធ្វើអត្ថាធិប្បាយអំពីការវិវឌ្ឍនៃការស៊ើបអង្កេតរបស់លោកទេកាលពីម្សិលមិញ។

លោក សុន ឆ័យ ប្រធានក្រុមតំណាងរាស្ត្រគណបក្សសង្គ្រោះជាតិ បានមានប្រសាសន៍ថា គោលបំណងរបស់នគរបាលក្នុងការបាញ់ជនស៊ីវិលដើម្បីគ្រប់គ្រងស្ថានភាព គឺកើតចេញពីវប្បធម៌នយោបាយដែលមានតាំងពីសម័យកុម្មុយនីស្តរបស់ប្រទេសនេះ។ លោកបានមានប្រសាសន៍ថា នគរបាលយល់យ៉ាងច្បាស់ថា តួនាទីរបស់ពួកគេនៅក្នុងការការពារអំណាចរដ្ឋធ្វើឱ្យមានកង្វល់ផ្សេងៗទៀត។

ដោយចាត់ទុកនគរបាលថា ជាអ្នកនាំមុខគេក្នុងការថែរក្សាអំណាចរដ្ឋនោះ លោកបានមានប្រសាសន៍ថា "រដ្ឋាភិបាលនេះកើតចេញពីអតីតបក្សកុម្មុយនីស្តនៃប្រទេសនេះ ហើយប្រទេសនេះនៅតែជាប្រព័ន្ធមានតែមួយបក្សដដែល ព្រោះនៅក្នុងប្រព័ន្ធនេះអ្វីៗត្រូវតែស្ថិតនៅក្រោមស្ថាប័នតែមួយ"។ លោកមានប្រសាសន៍ថា "ពួកគេប្រព្រឹត្តមកលើប្រជាជនតាមអំពើចិត្ត។ មិនមានសេវាសាធារណៈក្នុងប្រទេសនេះទេ មានតែមន្ត្រីគណបក្សប៉ុណ្ណោះនៅទីនេះដើម្បីត្រួតត្រាប្រជាជន ហើយពួកគេគិតថា ពួកគេមានសិទ្ធិសម្លាប់ប្រជាជន"។

លោក សៃម៉ុន ស្ព្រីងហ្គើ សាស្ត្រាចារ្យនៅសាកលវិទ្យាល័យ វីធើរៀ នៅក្នុងប្រទេសកាណាដាដែលបានសិក្សាអំពីការវិវឌ្ឍផ្នែកនយោបាយនៃប្រទេសកម្ពុជាក្នុងរយៈពេល១០ឆ្នាំមកនេះ បានមានប្រសាសន៍ថា នៅពេលមានការគំរាមកំហែងដល់អំណាច និងការត្រួតត្រារបស់គណបក្សប្រជាជនកម្ពុជាអំពើហិង្សាគឺជាយន្តការសម្រាប់ការពារ។

លោក ស្ព្រីងហ្គើ បានមានប្រសាសន៍ថា "មន្ត្រីនេះ ឱ្យអ្នកបាញ់សម្លាប់ អេង សុខុម មិនមែនជាអ្នកប្រើអំពើហិង្សានេះពិតប្រាកដទេ គាត់គ្រាន់តែជាតួអង្គធម្មតានៅក្នុងរឿងដ៏វែងមួយដែលយកអំពើហិង្សាធ្វើជាតម្លៃនៃការធ្វើពាណិជ្ជកម្ម។ អំពើហិង្សាជាធម្មតាមានន័យស្មើនឹងពាណិជ្ជកម្ម ហើយឥឡូវនេះគួរឱ្យសោកស្តាយណាស់ដែលពាណិជ្ជកម្មនៅកម្ពុជាដំណើរការល្អ"។

លោក សុក សំអឿន មេធាវីជំនួយផ្នែកច្បាប់ដ៏ឆ្នើមមួយរូបដែលបានគ្រប់គ្រងសាលាបណ្តុះបណ្តាលនគរបាលរបស់អង្គការសហប្រជាជាតិនៅក្នុងជំរំជនភៀសខ្លួនតាមបណ្តោយព្រំដែនថៃកាលពីទសវត្សរ៍ឆ្នាំ១៩៨០ បានមានប្រសាសន៍ថា នគរបាលកម្ពុជាបំពេញការងារដូចជាកងកម្លាំងយោធា ហើយគោលបំណងរបស់យោធា គឺសម្លាប់ និងការពាររដ្ឋ។

លោក សុក សំអឿន បានមានប្រសាសន៍ថា "នគរបាលកម្ពុជាមិនបានទទួលការបណ្តុះបណ្តាលគ្រប់គ្រាន់ទេ ហើយការបណ្តុះបណ្តាលដែលពួកគេទទួលបាន គឺថតចម្លងចេញពីទាហាន និងកងរាជអាវុធហត្ថ"។ លោកបានពន្យល់ថា ការបណ្តុះបណ្តាលរបស់យោធាយកតម្លៃនៃវិន័យ និងឋានន្តរសក្តិធំជាងអ្វីៗទាំងអស់ ។ "ពេលចូលវគ្គបណ្តុះបណ្តាលទាហានត្រូវបានបង្រៀនឱ្យចេះស្តាប់បញ្ជា។ ពួកគេមិនធ្វើឱ្យច្បាប់មានតុល្យភាពជាមួយបទបញ្ជាទេ"៕ **គីមហឿន**

ឌី ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងបកប្រែដោយមានការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌី ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ព្រហស្បតិ៍ ទី២១ ខែវិច្ឆិកា ឆ្នាំ២០១៣

# អាជ្ញាធរយកបទបញ្ជាធំជាងច្បាប់ ដើម្បីការពារអំណាចរបស់រដ្ឋាភិបាល

**ដោយ** **Alex Willemyns - November 21, 2013**

ចាប់ពីមន្ត្រីនគរបាលដល់អ្នកនាំពាក្យរដ្ឋាភិបាល មានការបង្ហាញសារមួយយ៉ាងច្បាស់កាលពីសប្តាហ៍មុនថា ការបាញ់ស្លាប់អ្នកស្រី អេង សុខុម ជាអ្នកលក់បាយអាយុ៤៩ឆ្នាំ និងការបាញ់ឱ្យរងរបួសមនុស្សប្រាំបួននាក់ទៀត អំឡុងពេលប៉ះទង្គិចគ្នាដោយហិង្សានៅក្នុងខណ្ឌមានជ័យ រាជធានីភ្នំពេញ គឺជាភារកិច្ចការពាររដ្ឋ។

នគរបាលបានបដិសេធមិនទទួលខុសត្រូវចំពោះការបាញ់ស្លាប់អ្នកលក់បាយនៅតាមផ្លូវរូបនេះទេ។ ប៉ុន្តែការស្លាប់ និងការរងរបួសដែលបង្កឡើងដោយគ្រាប់កាំភ្លើងរបស់នគរបាលអំឡុងពេលមានការតវ៉ាដោយហិង្សារបស់កម្មកររោងចក្រកាត់ដេរនេះ បានធ្វើឱ្យមានចម្ងល់អំពីការស្លាប់មនុស្សដែលបង្កឡើងដោយរដ្ឋ និងមានចម្ងល់ថា តើនរណាជាអ្នកទទួលខុសត្រូវចំពោះការស្លាប់របស់ជនស៊ីវិលស្លូតត្រង់។

លោក ផៃ ស៊ីផាន អ្នកនាំពាក្យទីស្តីការគណៈរដ្ឋមន្ត្រីមានប្រសាសន៍កាលពីសប្តាហ៍មុនអំពីមនុស្សដែលនគរបាលបានបាញ់នៅខណ្ឌមានជ័យថា "ប្រសិនបើពួកគេប្រើអំពើហិង្សាមកលើអាជ្ញាធរវាជាការប្រឆាំងនឹងអំណាចរដ្ឋ"។ លោកបានមានប្រសាសន៍ថា "នៅពេលយើងឃើញជនឆ្លៀតឱកាសព្យាយាមបំផ្លាញទ្រព្យសម្បត្តិរដ្ឋរដ្ឋមានសិទ្ធិការពារអាយុជីវិតនៃអំណាចរបស់ខ្លួន"។

រួមជាមួយនឹងសពអ្នកស្រី អេង សុខុម និងជនរងគ្រោះម្នាក់ទៀតក្នុងចំណោមជនរងគ្រោះដោយសារការប៉ះទង្គិចគ្នាកាលពីសប្តាហ៍មុន ដែលបណ្តាលឱ្យមានមនុស្សស្លាប់នេះ គឺនិស្សិតម្នាក់ឈ្មោះ ហឿន ចាន់ អាយុ ២៦ឆ្នាំ ដែលត្រូវបានបាញ់ចំឆ្អឹងខ្នងដោយគ្មានហេតុផលច្បាស់លាស់ពីមន្ត្រីនគរបាលមានកំហឹង។

លោក មឿន តុលា ប្រធានកម្មវិធីការងារនៅមជ្ឈមណ្ឌលអប់រំច្បាប់សម្រាប់សហគមន៍ បានមានប្រសាសន៍ថា "នេះគឺជាអ្វីដែលគណបក្សកាន់អំណាចតែងតែធ្វើដើម្បីការពារអំណាចរបស់ខ្លួន"។ មន្ត្រីនគរបាលដែលត្រូវបានបញ្ជូនទៅទប់ទល់នឹងការតវ៉ាមិនហ៊ានប្រឆាំងបទបញ្ជាឱ្យបាញ់ទៅលើបាតុករទេ ពីព្រោះបទបញ្ជារបស់ពួកគេគឺ ដើម្បីការពារអំណាចរដ្ឋ។ លោកមានប្រសាសន៍ថា "ពួកគេបង្ហាញថា ពួកគេនឹងបាញ់ ហើយប្រាប់អ្នកតវ៉ាមិនឱ្យហែក្បួន បើមិនដូច្នោះទេ ពួកគេត្រូវប្រឈមនឹងផលវិបាកដូចគ្នានេះ"។

លោកស្រី វ៉ាន ហ៊ី លី តំណាងឧត្តមស្នងការសហប្រជាជាតិទទួលបន្ទុកសិទ្ធិមនុស្សនៅកម្ពុជា បានមានប្រសាសន៍ថា លោកស្រីមិនអាចធ្វើអត្ថាធិប្បាយថា? តើមានបទបញ្ជាដោយផ្ទាល់ឱ្យមន្ត្រីនគរបាលថ្នាក់ក្រោមបាញ់អ្នកតវ៉ាដែលគ្មានអាវុធដោយចេតនា ឬយ៉ាងណានោះទេ។ ប៉ុន្តែលោកស្រីលី បានមានប្រសាសន៍ថា ការមិនស៊ើបអង្កេតឱ្យបាន ហ្មត់ចត់លើការស្លាប់អ្នកស្រី អេង សុខុម អាចនាំឱ្យមានការសន្និដ្ឋានថា ការបាញ់ស្លាប់អ្នកស្រី និងមនុស្សផ្សេងៗទៀតគឺជាការទទួលខុសត្រូវរបស់រដ្ឋ។ លោកស្រី លី បានមានប្រសាសន៍ថា "ការមិនស៊ើបអង្កេតឱ្យបានហ្មត់ចត់លើបទល្មើសនានា និងការមិនដាក់ទោសទណ្ឌអ្នកមានកំហុសតែងតែធ្វើឱ្យមានការគិតថា សារបែបនេះគឺជាការត្រឹមត្រូវ។ នេះ គឺជាគ្រោះថ្នាក់នៃនិទណ្ឌភាព"។

អ្នកនាំពាក្យឧត្តមស្នងការសហប្រជាជាតិទទួលបន្ទុកសិទ្ធិមនុស្សនៅទីក្រុងហ្សឺណែវ កាលពីសប្តាហ៍មុនបានអំពាវនាវឱ្យមានការស៊ើបអង្កេតជាបន្ទាន់ដើម្បីស្វែងរកអ្នកទទួលខុសត្រូវចំពោះការប្រើ កម្លាំងដែលបណ្តាលឱ្យមានមនុស្សស្លាប់ពីសំណាក់កងកម្លាំងប្រដាប់អាវុធកម្ពុជានៅក្នុងខណ្ឌមានជ័យ។

លោក កែម ឡី អ្នកវិភាគនយោបាយបានមានប្រសាសន៍ថា ប្រសិនបើមិនមានការស៊ើបអង្កេតច្បាស់លាស់លើការបាញ់ស្លាប់អ្នកស្រី អេង សុខុម ពីសំណាក់នគរបាលនេះទេ នេះមិនមែនជាលើកដំបូងទេ? ដែលគេមិនយកចិត្តទុកដាក់ចំពោះបទល្មើសបែបនេះ។ លោកបានមានប្រសាសន៍ថា" វាបានកើតឡើងជាច្រើនដងនៅក្នុងអតីតកាល គឺនៅឆ្នាំ១៩៩៧ ឆ្នាំ១៩៩៨ និងឆ្នាំ២000 និងមានជាច្រើនដងទៀត រហូតមកទល់ពេលនេះ ដោយមនុស្សជាច្រើនត្រូវបានកងកម្លាំងប្រដាប់អាវុធបាញ់ ហើយរដ្ឋាភិបាលកម្ពុជាតែងតែច្រានចោលមិនទទួលខុសត្រូវ"។

លោក កែម ឡី បានបញ្ជាក់ចំៗអំពីឈ្មោះ ម៉ៅ សុខចាន់ អាយុ២៩ឆ្នាំ ដែលត្រូវបានបាញ់ស្លាប់នៅជិតស្ពានមុនីវង្ស នៅយប់ទី១នៃការធ្វើមហាបាតុកម្មរបស់គណបក្សសង្គ្រោះជាតិ កាលពីខែកញ្ញាដោយកងកម្លាំងប្រដាប់អាវុធរបស់រដ្ឋាភិបាលដែលបានបាញ់កាំភ្លើងទៅលើក្រុមយុវជនគប់ដុំថ្មដែលមានកំហឹងដោយសារការបិទផ្លូវ។

មេធាវីកាណាដាមួយក្រុមបាននិយាយកាលពីសប្តាហ៍មុនថា ការបាញ់ស្លាប់អ្នកស្រី អេង សុខុម កាលពីសប្តាហ៍មុន គឺស្រដៀងគ្នានឹងការបាញ់ស្លាប់ ម៉ៅ សុខចាន់ ដែលជាអ្នកឈរមើលនគរបាលតបតជាមួយក្រុមមនុស្សគប់ដុំថ្មដូចគ្នានេះដែរ។

លោក កែម ឡី បានមានប្រសាសន៍ថា ការប្រើប្រាស់កម្លាំងធ្វើឱ្យមានមនុស្សស្លាប់ពីសំណាក់នគរបាលបែបនេះបានបង្ហាញយ៉ាងច្បាស់មិនត្រឹមតែតាមរយៈការឆ្លើយតបដោយធូររលុងរបស់រដ្ឋាភិបាលចំពោះ **តទៅទំព័រទី២១**

## តមកពីទំព័រទី ១២ កម្មករទាមទារឱ្យរោងចក្រអេសអិល...

បណ្តុះបណ្តាលវិជ្ជាជីវៈបានបញ្ជាក់ថា បទបញ្ជានោះនៅតែមានប្រសិទ្ធភាពលោកបានមានប្រសាសន៍ ថា "ប្រសិនបើរោងចក្រនេះនៅតែមិនព្រមអនុវត្តតាមបទបញ្ជាទេ យើងនឹងចាត់វិធានការផ្លូវច្បាប់ទៅលើពួកគេ"។ នៅខាងក្រៅរោងចក្រកម្មករបានប្តេជ្ញាថានឹងបន្តសកម្មភាពតវ៉ារបស់ខ្លួនរហូតទាល់តែបទបញ្ជារបស់រដ្ឋាភិបាលត្រូវបានអនុវត្តតាម។

លោក សៀង យុត មន្ត្រីផ្នែកច្បាប់នៅសម្ព័ន្ធសហជីពប្រជាធិបតេយ្យកម្មករកាត់ដេរកម្ពុជាដែលមានកម្មករភាគច្រើនជាសមាជិកបានមានប្រសាសន៍ថា "យើងនៅតែបន្តការតវ៉ារហូតទាល់តែពួកគេទទួលតំណាងទាំង១៩នាក់ឱ្យចូលធ្វើការវិញ។ យើងតវ៉ាដោយសារតែក្រុមហ៊ុនមិនអនុវត្តតាមបទបញ្ជារបស់រដ្ឋាភិបាល ហើយយើងអំពាវឱ្យក្រុមហ៊ុនយកចិត្តទុកដាក់ចំពោះលិខិតរបស់ទីស្តីការគណៈរដ្ឋមន្ត្រី"។

លោក សៀង យុត បានមានប្រសាសន៍បន្តទៀតថា "នៅពេលពួកគេអនុវត្តតាមសេចក្តីបង្គាប់របស់រដ្ឋាភិបាល និងទទួលកម្មករ១៩នាក់ឱ្យចូលធ្វើការវិញ នោះយើងនឹងចូលធ្វើការជាធម្មតាវិញ ក៏ប៉ុន្តែប្រសិនបើពួកគេនៅតែមិនព្រមទទួលតំណាងទាំងនោះយើងនឹងអំពាវឱ្យមានការតវ៉ាទូទាំងប្រទេស និងការគាំទ្រពីមជ្ឈដ្ឋានអន្តរជាតិ ពីព្រោះយើងមានលិខិតរបស់ទីស្តីការគណៈរដ្ឋមន្ត្រី"៕

**សុធា**

## Contined from page12 World Bank Report Says...

world pour into the sector.

Grant Knuckey, CEO of ANZ Royal, said Monday he disagreed with the World Bank's figure on the number of accountholders in the country.

"The current figure in terms of percentage of the population with an account at a formal financial institution is in excess of 10 percent now," he said.

Mr. Knuckey also said the number of ANZ Royal customers with a savings account far exceeds the 1 percent stated in the report.

"ANZ Royal has far more than that number by itself," he said, declining to give an exact amount.

In Channy, CEO of Acleda Bank, also said his bank has more than 1 million accounts, and that the total amount of money saved by its account holders currently stands at roughly $1.5 billion.

"The World Bank needs to look at the future and see the number of banks coming into the industry. The [percentage] of Cambodians now with a bank account is more like 10 percent," he said.

# ហុង ណេត ជាប់ឆ្នោតជា គណៈក្រុមប្រឹក្សាក្រុងសារជាថ្មី
# Hong Net Re-elected

**Lynn.MA :** បេក្ខជនខ្មែរអាមេរិកាំង២នាក់ បានឈរឈ្មោះជាគណៈក្រុមប្រឹក្សាក្រុង លីន សម្រាប់ថ្ងៃបោះឆ្នោតទី ៥ វិច្ឆិកា កន្លងទៅ គឺ លោក ហុង ណេត បេក្ខជន Coucilor at Large និងលោក ចេក កែវ ឈរនៅ Ward 5 ។

ប្រជាពលរដ្ឋ៣១% បានចេញទៅបោះឆ្នោត ត្រូវជាចំនួនប្រមាណ១៥៦០០នាក់ក្នុងនោះមាន ជនជាតិអាស៊ីជាពិសេសខ្មែរប្រមាណ១ពាន់នាក់ ។ លោក ហុង ណេត បានជាប់ឆ្នោតក្នុងលំដាប់ថ្នាក់ លេខ៣ ដោយទទួលការគាំទ្រ៦០៤៥សម្លេង - រីឯលោក ចេក កែវ ពុំបានជាប់ឆ្នោតទេ ។





លោក ចេក កែវ



លោក ហុង ណេត

លោក ហុង ណេត បានជាប់ឆ្នោតក្នុងអាណត្តិទី២ ម្តងទៀតនេះ លោកនិយាយថា ដោយសារ :

១-ប្រជាពលរដ្ឋយល់ថា លោកធ្វើការជូនសហគមន៍បានល្អ ហើយចង់ឱ្យបន្តការងារនោះតទៅទៀត ។

២-លោកឆ្លើយតបបានរហ័សគ្រប់សេចក្តីត្រូវការរបស់ពលរដ្ឋ ។

៣-មិននិយាយអាក្រក់ពីបេក្ខជនផ្សេងឯទៀត



៤-ធ្វើការឃោសនាស្មើភាពគ្នារវាងគ្រប់ជាតិសាសន៍ដែលរស់នៅលីន

៥-គម្រោងដែលអ្នកបោះឆ្នោតពេញចិត្តច្រើន គឺបំណងតម្លើងប៉ូលិសឱ្យដល់២២៥នាក់ និងការចង់កែទម្រង់ការងារសាធារណ

៦-មិនថាតែខ្មែរទេដែលជួយធ្វើការឃោសនាឱ្យលោក ហុង ណេត សូម្បីតែសាសន៍ដទៃក៏ជួយធ្វើការឃោសនាឱ្យលោក ហុង ណេត ដែរ ។ ហើយសហគមន៍ជាច្រើនបានគាំទ្របេក្ខភាពលោកទាំងក្រុម៧ដល់រូបលោក ។

លោក ហុង ណេត និយាយថា : ៥ខែដែលលោកបំពេញការឃោសនានៅលីនលោកធ្វើការច្រើនដើរគោះទ្វារតាមផ្ទះទាក់ទងតាមដែលអាចធ្វើបានតែចំណាយថវិការអស់មិនដល់១ម៉ឺនដុល្លារទេ ដោយសារនៅសម្ភារៈពីមុនមកច្រើន ៕

KhmerPost USA, LLC
សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក
អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852
លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092
អ៊ីម៉ែល info@khmerpost.us
អានកាសែតនៅគេហទំព័រ www.khmerpost.us
តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA
ផ្សាយពាណិជ្ជកម្ម Advertising
អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*
លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office) |
អ៊ីម៉ែលsobenpin@khmerpost.us
អ្នកនិពន្ធ Editorials
និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*
(978) 942 - 1641 | rogerpin@khmerpost.us

អ្នកនិពន្ធកិត្តិយស Contributed Writers:
Kim Phien, Kim Sos, Mao Chan Somnom, Mam Yin, Richard Howe Esq. Sengly Kong, Ph.D. James Ostis
ច្នៃសោភ័ណភាពកាសែត Design Artist
Heng Chhunleng
ជំនួយការរដ្ឋបាល Administrative Assistant
Sokha Lim

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at $60.00 or 70 Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

# ព័ត៌មានសង្ខេបក្នុងតំបន់
# Highlights Local News

## ឃោសនាឱ្យទិញផលិតផលក្នុងតំបន់ឡូវែល

១-មជ្ឈមណ្ឌល " Merrimack Valley Small Business" កំពុងបើកយុទ្ធនាការឃោសនាឱ្យគេចូលចិត្តទិញផលិតផលក្នុងតំបន់ នៅថ្ងៃ សៅរ៍ទី៣០វិច្ឆិកា មានរង្វាន់ថង់ស្ពាយ ឬឈ្នះរង្វាន់ជាប័ណ្ណ $១០០ ទៀតផង។

Nationally, Saturday November 30 is Small Business Saturday. the Merrimack Valley Small Business Center is running a shop local campaign. Shop at a participating business all around downtown Lowell to get one of these cool FREE tote bags (while supplies last). Remember to register, you could win $100 gift certificate to a small business of your choice! Check out all participating businesses online at http://www.merrimackvalleysmallbusiness.com /resources/more-shop-local/



Stacie Ann Hargis -Executive Director at Merrimack Valley Small Business Center and Kristin Wallace.

## ២-កម្មវិធីក្រុងខ្មែរចូលទូរទស្សន៍ អិល ធី ស៊ី (LTC)

គណកម្មការក្រុងខ្មែរបានបង្កើតកម្មវិធីថ្មីស្រឡាងរបស់ខ្លួនមួយដែលនឹងបង្ហាញខ្លួននៅរៀងរាល់ថ្ងៃអាទិត្យពីម៉ោង១ដល់ម៉ោង២រសៀល នឹងពីម៉ោង ១០ ដល់១១យប់ សម្រាប់ថ្ងៃព្រហស្បតិ៍ពីម៉ោង២ទៅម៉ោង៣រសៀល។

Cambodia Town TV Show on Channel 95 LTC on Sunday from 1-2pm and 10-11pm and Thursday 2-3pm and 10-11pm. The crew include Mr. Ratha Yem, Host, in the middle, Rotha Khai on the right and Tolayuth Ok on the left. **សូមអានបន្តនៅទំព័រទី ២៥**





# Cambodia Town
**21 Branch St., Suite 8, Lowell, MA 01851**




Cambodia Town Board of Directors

Dr. Sengly Kong
Mr. Tolayuth Ouk
Mr. Rotha Khai
Mr. Vong Ros
H.E. Sam An Um
Mr. Rath Mam
Mr. Paul Ratha Yem
Mr. Chanbunna Taing
Mr. Vanny Hang
Mr. Tooch Vann

គណៈកម្មការក្រុងខ្មែរឡូវែល
<u>គោរពជូន</u>

សម្តេចអគ្គមហាសេនាបតីតេជោ ហ៊ុន សែន នាយករដ្ឋមន្ត្រីនៃព្រះរាជាណាចក្រកម្ពុជា

តាងនាមគណៈកម្មការក្រុងខ្មែរឡូវែល ខ្ញុំមានក្តីសោមនស្សរីករាយក្រៃលែងចំពោះការបកស្រាយរបស់តុលាការអន្តរៈជាតិដែលបានបញ្ជាក់ជាថ្មីម្តងទៀតថា ផ្ទៃដីទំហំប្រមាណ ៤.៦ គីឡូម៉ែត្រក្រឡាដែលស្ថិតនៅជុំវិញប្រាសាទព្រះវិហារ គឺស្ថិតនៅក្រោមអធិបតេយ្យភាពនៃព្រះរាជាណាចក្រកម្ពុជា និង បានដាក់បង្គាប់ឲ្យរដ្ឋាភិបាលក្រុងបាងកកដកកងទ័ពទាំងអស់របស់ខ្លួនចេញពីតំបន់នេះ។

ការបញ្ជាក់របស់ស្ថាប័នយុត្តិធម៌អន្តរៈជាតិនេះនឹងបញ្ចប់នូវការប្រឈមមុខដាក់គ្នាដោយប្រដាប់អាវុធរវាងព្រះរាជណាចក្រទាំងពីរដែលបានកើតឡើងជាងកន្លះទសវត្សកន្លងទៅនេះ។ ការសំរេចនេះក៏បានបញ្ជាក់យ៉ាងច្បាស់ថាព្រះរាជាណាចក្រកម្ពុជា និង ប្រជាជនកម្ពុជា គឺជាពលរដ្ឋថ្លៃថ្នូរ ស្លូតត្រង់ ស្រលាញ់សន្តិភាព និង តែងតែគោរពអធិបតេយ្យភាពនៃប្រទេសជិតខាងជានិច្ច។ ប៉ុន្តែពលរដ្ឋកម្ពុជាក៏នឹងមិនញញើតក្នុងការប្រឈមចំពោះការរំលោភ ឬ ការប៉ុនប៉ងរំលោភអធិបតេយ្យភាព និង បូរណភាពទឹកដីពីបរទេសតូចធំជិតឆ្ងាយណាមួយឡើយ។

ក្នុងបុព្វហេតុខាងលើនេះ គណៈកម្មការក្រុងខ្មែរឡូវែលសូមចូលរួមអបអរសាទរនិងកោតសរសើរចំពោះការខិតខំប្រឹងប្រែងរបស់រាជរដ្ឋាភិបាលកម្ពុជាដែលបានគោរពតាមឆន្ទៈដ៏ពិសិដ្ឋនៃពលរដ្ឋកម្ពុជាដែលបានទទូចសុំឲ្យរាជរដ្ឋាភិបាលស្វែងរកការដោះស្រាយបញ្ហាតាមយន្តកាតុលាអន្តរៈជាតិដោយពិនិត្យឡើងវិញនូវសេចក្តីសំរេចរបស់ស្ថាប័ននេះកាលពីឆ្នាំ១៩៦២ទាក់ទងទៅនឹងយុត្តាធិការនៃតំបន់ដីជុំវិញប្រាសាទព្រះវិហារ។ នេះ គឺជាជោគជ័យ និង មោទនៈភាពរបស់ពលរដ្ឋកម្ពុជាទាំងក្នុង និង ក្រៅប្រទេសរួមទាំងពលរដ្ឋខ្មែរអាមេរិកាំងដែលរស់នៅទីក្រុងខ្មែរឡូវែលទៀតផង។

ជាទីបញ្ចប់ សូមសម្តេចមេត្តាទទួលនូវការគោរពរាប់អានដ៏ស្មោះស្ម័គ្រអំពីយើងខ្ញុំ។

ធ្វើនៅក្រុងខ្មែរឡូវែល ថ្ងៃទី ១៥ ខែ វិច្ឆិកា ឆ្នាំ ២០១៣
ប្រធានគណៈកម្មការក្រុងខ្មែរ

បណ្ឌិត គង់ សេង លី
បណ្ឌិតនយោបាយសាធារណៈ

## តមកពីទំព័រទី ១២ ធនាគារពិភពលោកៈ ប្រជា...

(21,4) និងប្រទេសឥណ្ឌូណេស៊ី (19,6)។ ទោះបីជាការដែលប្រជាជនខ្មែរទូទៅមិនសូវទុកចិត្តលើ ឬក៏មិនសូវមានការយល់ដឹងអំពីធនាគារ គឺជារឿងពិតក៏ដោយ ក៏វិស័យហិរញ្ញវត្ថុនៅក្នុងប្រទេសនេះបាន និងកំពុងរីកចម្រើនយ៉ាងលឿន។ ទាំងបរិមាណប្រាក់បញ្ញើទាំងបរិមាណឥណទានដែលត្រូវបានបញ្ចេញក្នុងវិស័យធនាគារបានកើនឡើងយ៉ាងគំហុកក្នុងរយៈពេលប៉ុន្មានឆ្នាំចុងក្រោយនេះ ដោយសារតែធនាគារនានានៅទូទាំងពិភព លោកបានចូលប្រឡូកនៅលើទីផ្សារនេះ។

លោក ហ្គ្រាន ណាក់ឃី (Grant Knuckey) ប្រធាននាយកប្រតិបត្តិធនាគារអេអិនហ្សិត រ៉ូយ៉ាល់ (ANZ Royal) បានលើកឡើងកាលពីម្សិលមិញថា លោកមិនយល់ស្របនឹងតួលេខរបស់ធនាគារពិភពលោកទាក់ទងនឹងចំនួនម្ចាស់គណនីនៅក្នុងប្រទេសកម្ពុជាទេ។ លោកបានមានប្រសាសន៍ថា "តួលេខបច្ចុប្បន្នទាក់ទងនឹងភាគរយនៃចំនួនប្រជាជនដែលមានគណនីនៅគ្រឹះស្ថានហិរញ្ញវត្ថុផ្លូវការ ឥឡូវនេះមានលើសពី១០ភាគរយ"។

លោក ណាក់ឃី ក៏បានលើកឡើងបន្តទៀតថា ចំនួនអតិថិជនរបស់ធនាគារអេអិនហ្សិត រ៉ូយ៉ាល់ ដែលមានគណនីបញ្ញើ-សន្សំលើសពីជំនួយ១ភាគរយដែលត្រូវបានបង្ហាញនៅក្នុងរបាយការណ៍នេះ។ លោក ណាក់ឃី បន្ថែមទៀតថា "ធនាគារ អេអិនហ្សិត រ៉ូយ៉ាល់ផ្ទាល់មានចំនួនច្រើនជាងចំនួនក្នុងរបាយការណ៍នោះ"។ ក៏ប៉ុន្តែលោកបានបដិសេធមិនប្រាប់តួលេខពិត។

លោក អ៊ិន ចាន់នី ប្រធាននាយកប្រតិបត្តិធនាគារអេស៊ីលីដាភីអិលស៊ី (Acleda Bank Plc) ក៏បានលើកឡើងផងដែរថា ធនាគាររបស់លោកមានគណនីជាង១លានគណនី ហើយចំនួនប្រាក់សន្សំសរុបរបស់ម្ចាស់គណនីធនាគារទាំងនេះ បច្ចុប្បន្នមានប្រហែល១.៥ពាន់លានដុល្លារ។ លោកបានមានប្រសាសន៍ថា "ធនាគារពិភពលោកត្រូវសម្លឹងមើលទៅអនាគត និងមើលចំនួនធនាគារដែលបានចូលខ្លួនមកប្រកបអាជីវកម្មក្នុងប្រទេសនេះ។ ឱ្យភាគរយនៃចំនួនប្រជាជនខ្មែរដែលបច្ចុប្បន្នមានគណនីធនាគារមានជាង១០ភាគរយ"៕ **សុធា**

# បំបាត់អាចម៍រុយដោយទំពាំងបាយជូរ

កាលណាគេនិយាយពីសោភ័ណភាពស្បែក នោះគោលដៅចម្បងពិតជាគេចមិនផុតពីសុភាពស្ត្រី ព្រោះថា រឿងសម្រស់វាហាក់ដូចជាផ្សារភ្ជាប់ទៅនឹងជីវិតបច្ចុប្បន្នដែលជាយុគមួយកំពុង



ពេញនិយមក្នុងការប្រកួតប្រជែងសម្ផស្សគ្នានោះ ។

សម្រាប់រឿងស្នាមជ្រីវជ្រួញ ឬក៏ស្នាមអាចម៍រុយគ្មាននរណាម្នាក់មានបំណងប្រាថ្នាឱ្យវាកើតមាននៅលើមុខរបស់ខ្លួននោះឡើយ ព្រោះវាមិនមែនជារឿងដែលគួរត្រេកត្រអាល ។ ដូច្នេះយើងនាំគ្នាក្រឡេកមកមើលពីភាពសំខាន់ក្នុងការស្វែងរករូបមន្តពិសេស ដើម្បីលុបបំបាត់ចំណុចអាចម៍រុយនៅលើមុខអ្នកដូចខាងក្រោមនេះ :

**-វិធីនៃរូបមន្តពិសេសនេះអាចចាប់ផ្តើមបានដោយខ្លួនឯងគឺ :** ការត្រៀមទំពាំងបាយជូរពណ៌បៃតងពី៤-៥ផ្លែ ទឹកដោះគោជូរ២ ស្លាបព្រាកាហ្វេ និងទឹកឃ្មុំសុទ្ធមួយស្លាបព្រាកាហ្វេ ។ បន្ទាប់មកយកទំពាំងបាយជូរបៃតងមកពុះយកគ្រាប់ចេញ រួចហើយយកទៅដាក់ក្នុងម៉ាស៊ីនកិនឱ្យល្អិតលាយជាមួយទឹកដោះគោជូរ ទឹកឃ្មុំ រួចហើយក្រឡុកចូលគ្នាឱ្យសព្វ ។

បន្ទាប់ពីនោះនាំយកមកបំពោកលើផ្ទៃមុខដោយទុកសំដិលចោលរយៈពេល២០នាទី ទើបលាងជម្រះដោយប្រើទឹកក្តៅឧណ្ហៗរូបមន្តនេះអាចធ្វើបានញឹកញាប់រៀងរាល់២-៣ សប្តាហ៍ជាប់បន្តគ្នាដែលយ៉ាងហោចណាស់ទាមទារឱ្យប្រើរយៈពេល១៥ថ្ងៃ ទើបឃើញលទ្ធផល ។ រូបមន្តពិសេសៗបែបនេះសុភាពស្ត្រីទាំងឡាយមិនគួរមើលរំលងនោះឡើយ ។ ដូច្នេះចាប់តាំងពីពេលនេះតទៅសង្ឃឹមថា អ្នកនឹងយករូបមន្តនេះប្រើប្រាស់ដើម្បីសម្រស់ផ្ទៃមុខជាក់ជាមិនខាន ៕

# តែបៃតងអាចជួយកាត់បន្ថយជំងឺមហារីក

ការស្រាវជ្រាវមួយបានរាយការណ៍ថា ស្ត្រីជនជាតិជប៉ុនដែលផឹកតែបៃតងយ៉ាងតិច៥ពែងជារៀងរាល់ថ្ងៃអាចកាត់បន្ថយអត្រាគ្រោះថ្នាក់ក្នុងការកើតជំងឺមហារីកក្រពះបានដល់ទៅ២០ភាគរយ បើប្រៀបធៀបជាមួយនឹងស្ត្រីធម្មតា ។

ក្រុមអ្នកស្រាវជ្រាវបានស្រាវជ្រាវអំពីការទប់ស្កាត់ជំងឺមហារីករបស់តែបៃតងដោយសារតែពួកគេមានការសង្ស័យថា ជាតិប្រឆាំងនឹងអុកស៊ីដកម្មនៅក្នុងភេសជ្ជៈនេះប្រហែលជាអាចប្រឆាំងនឹងរោគកំណាចនេះ ។ និយាយម្យ៉ាងទៀតថា តែបៃតងនេះអាចនឹងមានសារជាតិមួយចំនួនដែលអាចប្រយុទ្ធប្រឆាំងបាក់តេរីដែលមានការជាប់ពាក់ព័ន្ធធ្វើឱ្យកើតមហារីកក្រពះ ។

ក្រុមអ្នកស្រាវជ្រាវបានរកឃើញថា មានការធ្លាក់ចុះគ្រោះថ្នាក់នៃការកើតរោគមហារីកក្រពះចំនួន២០ភាគរយ ចំពោះអ្នកដែលបានផឹកតែបៃតងយ៉ាងតិច៥ពែងក្នុងមួយថ្ងៃ ។ អ្នកស្រាវជ្រាវបានធ្វើការកត់សម្គាល់ផងដែរថា អត្រាគ្រោះថ្នាក់ដែលមានការធ្លាក់ចុះនេះ គឺកើតឡើងតែចំពោះជំងឺមហារីកមួយចំនួនដែលកើតមាននៅផ្នែកជាក់លាក់ខ្លះនៃក្រពះ អាហារតែប៉ុណ្ណោះ ៕



វិចារណកថា

# ថ្ងៃសុក្រខ្មៅ

# Black Friday



ក្នុងរយៈជាង១០ឆ្នាំចុងក្រោយនេះថ្ងៃសុក្រខ្មៅមានប្រជាប្រិយភាពណាស់ ដោយជួយអ្នកក្រឱ្យអាចធ្វើអំណោយដល់អ្នកដទៃបាននឹងជួយឱ្យពាណិជ្ជករបន្ទូរទំនិញដែលលក់មិនទាន់ដាច់ចេញពីហាងធំៗរបស់ខ្លួនបានផង ។

ថ្ងៃសុក្រខ្មៅនេះបានប្រារព្ធឡើងជារៀងរាល់ឆ្នាំនៅ១សប្តាហ៍បន្ទាប់ពីថ្ងៃឈប់សម្រាក "ថាំងគីវីង"Thanksgivingមក ។ គឺនៅប្រមាណ១ខែមុន"គ្រីះស្មឹស"(Christmas) និងថ្ងៃដាច់ឆ្នាំដែលគ្រប់គ្រួសារអាមេរិកាំងគេធ្វើអំណោយគ្នាទៅវិញ ទៅមកដ៏ធំបង្អស់ប្រចាំឆ្នាំ គឺថ្ងៃសុក្រខ្មៅនេះជាឱកាសដ៏ល្អបំផុតសម្រាប់ទិញ"កាដូ"ត្រៀមឱ្យកូនចៅ ឬបងប្អូនមិត្តភ័ក្រ្តជាទីស្នេហារបស់ខ្លួនបានក្នុងតម្លៃដ៏ថោកបំផុត ។ ឆ្នាំនេះថ្ងៃសុក្រខ្មៅ និងមកដល់នៅថ្ងៃសុក្រ ទី ២៩ វិច្ឆិកា ២០១៣ ។

ថ្ងៃសុក្រខ្មៅនោះហាងធំៗមាន វលម៉ាក "Walhark"បេសបាយ Bestbye.. ។ល។ គេបើកទ្វារលក់ទាំងព្រលឹមអុរ នាម៉ោង៤ឬ៥ភ្លឺ ។




អ្នកដែលទៅដល់មុនអាចជ្រើសរើសទិញយករបស់ល្អក្នុងតម្លៃ១០ឬ២០%ប៉ុណ្ណោះបាន ។ ខ្លះអាចទិញកុំព្យូទ័រ ឬទិញទូរទស្សន៍ ឬសម្ភារៈប្រើប្រាស់ក្នុងផ្ទះក្នុងតម្លៃមិនដល់៥០%នៃតម្លៃលក់ធម្មតាផង តែភ្ញៀវនោះត្រូវមកបន្តកន្ទុយរង់ចាំចូលហាងឱ្យបានមុនគេ... ជាទូទៅញកន្ទុយរង់ចាំដ៏វែងនៅមុខហាងល្បីៗបានផ្តើមតាំងពីល្ងាច ទោះជាសីតុណ្ហភាពចុះត្រជាក់ខ្លាំងយ៉ាងណាក៏ដោយ ។ រីឯអ្នកទៅដល់ក្រោយគេ២បីម៉ោងមកលែងឃើញទំនិញក្នុងតម្លៃ១០ឬ២០%ទៀត ហើយទំនិញដដែលនោះឡើងថ្លៃដល់៥០ឬ៦០ ឬ៧០%នាម៉ោងបន្តបន្ទាប់រហូតដល់ចប់ថ្ងៃសុក្រខ្មៅនោះ ។

ឃើញភ្ញៀវដ៏អ៊ូអរសម្រុកចូលហាង ដូច្នោះហាងធំៗខ្លះចាប់បើកទ្វារតាំងពីម៉ោង១២យប់ ដើម្បីយកភ្ញៀវឱ្យបានមុនគេមុនចាំលុយអស់ ។ ជាទូទៅរបស់របរដាក់លក់គេយកថ្លៃទិញមកគុណនឹង២ ឬ ២.៥





ដើម្បីឱ្យបានថ្លៃលក់ហើយចំណេញគ្រាន់បើតែថ្ងៃនោះបើទោះបីជាលក់ក្នុងតម្លៃតែ៥០%ក៏គង់នៅមានចំណេញបន្តិចបន្តួចដែរ តែដែលសំខាន់នោះ អីវ៉ាន់អាចលក់ស្ទើរអស់ពីហាងធ្វើឱ្យហាងនីមួយៗមានលុយចំណូលក្នុងបេឡាវិញ បានច្រើន ហើយអាចត្រៀមទិញបញ្ចូលទំនិញថ្មីៗបានសម្រាប់ឆ្នាំក្រោយទៀតផង ។

គ្រួសារខ្មែរជំនាន់ក្រោយបានយល់ពីវប្បធម៌ធ្វើអំណោយនាដំណាច់ឆ្នាំនីមួយៗច្បាស់លាស់ជាទម្លាប់ទៅហើយ ។ គេឃើញឪពុកម្តាយក្មេងៗជាច្រើនប្រជែងគ្នាជាមួយគេឯងទៅទិញវត្ថុជាអំណោយយួរពេញដៃទៅដាក់ក្នុងរថយន្តដើម្បីកូន ឬប្អូនបងឪពុកម្តាយនាឱកាសចូលឆ្នាំថ្មី ។

ក្រុងខ្មែរនៅឡូវែល ឬផ្លូវពាណិជ្ជកម្មខ្មែរលេខ៧ខាងត្បូងនៅហ្វីឡាដែលហៀបពុំទាន់មានឮដំណឹងថានឹងត្រៀមផ្សព្វផ្សាយពីគម្រោងផលិតផលសម្រាប់ថ្ងៃសុក្រខ្មៅ ឬសម្រាប់ដាច់ឆ្នាំអ្វីនឹងគេនៅឡើយទេ គេសង្ឃឹមថា "មុខរបរ" លក់ដូរនឹងបានប្រសើរឡើងដោយមិនចាំបាច់អួតអាង ដូចជាចាស់ទុំខ្មែរចូលចិត្តទៅលេងស្រុកខ្មែរ នាចុងឆ្នាំរដូវត្រជាក់រហូតដល់ចូលឆ្នាំខ្មែររួច ដូច្នេះវាត្រូវប៉ាន់អ្នកលក់សំបុត្រយន្តហោះ ឬវត្ថុអនុស្សាវរីយ៍ជាដើម ។ ការលក់ម្ហូបចំណីខ្មែរពឹងផ្អែកទៅលើពិធីជប់លៀង ឬនាំអ្នកចម្រៀងពីស្រុកខ្មែរមកជូនអ្នកនៅបរទេសកំសាន្តកំដររាត្រីចូលឆ្នាំថ្មីតាមរបៀបខ្មែរ ដើម្បីបញ្ចប់ឆ្នាំ២០១៣នេះ ៕




The Cambodian-American Biweekly Newspaper

a free local newspaper reaching over 20,000 Cambodian readers in the Greater Lowell area every two weeks

## Soben Pin, Managing Partner

## 978.677.7163 (Office) 978. 656.8114 (Mobile)

## Reserve Your Winter Ad with us today and receive up to 20% OFF!

**(Please mention this coupon ad: Winter2013)**

### Sample of our affordable pricing

| Page Size | Length x Width | 1 month | 3 months 10%OFF | 6 months 15%OFF | 12 months 20%OFF |
|---|---|---|---|---|---|
| 1/2 page color | (6.5"x10") | $484 | $440/m | $411/m | $387/m |
| 1/4 page color | (6.5"x5") | $264 | $240/m | $224/m | $211/m |
| 1/4 Classify Ad | (6.5"x5") | $160 | | | |
| 1/8 Classify ad | (3.25"x5") | $100 | | | |
| Business Card | | $50 | | | |

### Our 2014 Print Schedules

| | |
|---|---|
| January 10th & 24th | July 11th & 25th |
| February 7th & 21st | Augus 8th & 22nd |
| March 7th & 21st | September 5th & 19th |
| April 4th & 18th | October 3rd & 17th |
| May 9th & 23rd | November 7th & 21st |
| June 6th & 20th | December 5th & 19th |




### Call or Visit our Sales Office

45 Merrimack Street. Suite 218A. Lowell, MA 01852
Tel: 978.677.7163. Cell:978. 656.8114 Fax: 978.677.7092
Email: sobenpin@khmerpost.us or KhmerPostUSA@gmail.com
www.khmerpost.us | www.facebook.com/KhmerPostUSA

តមកពីទំព័រទី ១៣

## អាជ្ញាធរយកបទបញ្ជាធំជាងច្បាប់...

ការស្លាប់របស់អ្នកស្រី អេង សុខុម ប៉ុណ្ណោះទេ ប៉ុន្តែក៏បង្ហាញថា ការប្រើកម្លាំងបែបនេះផ្ទុយពីដំណោះស្រាយដោយសន្តិវិធីរបស់ខ្លួន ចំពោះការជួបជុំគ្នាធំៗផ្សេងទៀតកាលពីពេលកន្លងមកដែរ។

លោកបានមានប្រសាសន៍ថា ការដើរក្បួននៅក្នុងរាជធានីភ្នំពេញរយៈពេលបីថ្ងៃរបស់គណបក្សសង្គ្រោះជាតិ កាលពីខែមុនដែលពេលនោះនគរបាលបានដកខ្លួនចេញ និងមានការគោរពតាមបទបញ្ជាដោយផ្ទាល់របស់លោក ស ខេង រដ្ឋមន្ត្រីក្រសួងមហាផ្ទៃនោះ បានបង្ហាញពីកម្រិតនៃការត្រួតត្រារបស់រដ្ឋាភិបាលទៅលើកងកម្លាំងប្រដាប់អាវុធ។ លោក កែម ឡី បានមានប្រសាសន៍ថា "អ្វីៗគ្រប់យ៉ាងស្ថិតនៅក្រោមការត្រួតត្រាដ៏តឹងរ៉ឹងពីរដ្ឋាភិបាល ដូចជានគរបាលកងរាជអាវុធហត្ថ និងគោលដៅដែលពួកគេត្រូវបំពេញការងារឱ្យនៅក្នុងការដោះស្រាយជាមួយអ្នកតវ៉ា។ នេះជាការទទួលខុសត្រូវរបស់រដ្ឋាភិបាល"។

លោកបានបន្ថែមថា ប្រសិនបើរដ្ឋាភិបាលនៅតែបដិសេធថា ការបាញ់ស្លាប់មនុស្សនៅកន្លែងតវ៉ាក្នុងខណ្ឌមានជ័យនេះ មិនមែនជាការទទួលខុសត្រូវរបស់រដ្ឋាភិបាលនោះ រដ្ឋាភិបាលគួរតែធ្វើការស៊ើបអង្កេតឱ្យបានច្បាស់លាស់ដើម្បីយកអ្នកទទួលខុសត្រូវមកផ្តន្ទាទោសតាមច្បាប់។ លោក កែម ឡី មានប្រសាសន៍ថា "រដ្ឋាភិបាលត្រូវតែនាំខ្លួននគរបាលដែលទទួលខុសត្រូវឡើងតុលាការ ប្រសិនបើពួកគេចង់បដិសេធមិនទទួលខុសត្រូវចំពោះរឿងនេះ បើមិនដូច្នោះទេ រដ្ឋាភិបាលជាអ្នកទទួលខុសត្រូវចំពោះរឿងនេះ"។

មាត្រា៥១ នៃច្បាប់ស្តីពីសហលក្ខន្តិកៈមន្ត្រីរាជការស៊ីវិលចែងថា ក្នុងករណីដែលមន្ត្រីរាជការណាម្នាក់ប្រព្រឹត្តបទល្មើសព្រហ្មទណ្ឌ ហើយត្រូវបានព្រះរាជអាជ្ញាសម្រេចធ្វើការចោទប្រកាន់ ព្រះរាជអាជ្ញាត្រូវជូនដំណឹងអំពីការចោទប្រកាន់នោះទៅប្រធានស្ថាប័នសាមី។

លោក ហ៊ី ព្រូ ស្នងការរងនគរបាលរាជធានីដែលកំពុងដឹកនាំការស៊ើបអង្កេតលើការបាញ់ស្លាប់អ្នកស្រី អេង សុខុម បដិសេធមិនធ្វើអត្ថាធិប្បាយអំពីការវិវឌ្ឍនៃការស៊ើបអង្កេតរបស់លោកទេកាលពីម្សិលមិញ។

លោក សុន ឆ័យ ប្រធានក្រុមតំណាងរាស្ត្រគណបក្សសង្គ្រោះជាតិ បានមានប្រសាសន៍ថា គោលបំណងរបស់នគរបាលក្នុងការបាញ់ជនស៊ីវិលដើម្បីគ្រប់គ្រងស្ថានភាព គឺកើតចេញពីវប្បធម៌មិនយោបាយដែលមានតាំងពីសម័យកុម្មុយនីស្តរបស់ប្រទេសនេះ។ លោកបានមានប្រសាសន៍ថា នគរបាលយល់យ៉ាងច្បាស់ថា តួនាទីរបស់ពួកគេនៅក្នុងការការពារអំណាចរដ្ឋធ្វើឱ្យមានកង្វល់ផ្សេងៗទៀត។

ដោយចាត់ទុកនគរបាលថា ជាអ្នកនាំមុខគេក្នុងការថែរក្សាអំណាចរដ្ឋនោះ លោកបានមានប្រសាសន៍ថា "រដ្ឋាភិបាលនេះកើតចេញពីអតីតបក្សកុម្មុយនីស្តនៃប្រទេសនេះ ហើយប្រទេសនេះនៅតែជាប្រព័ន្ធមានតែមួយបក្សដដែល ព្រោះនៅក្នុងប្រព័ន្ធនេះអ្វីៗត្រូវតែស្ថិតនៅក្រោមស្ថាប័នតែមួយ"។ លោកមានប្រសាសន៍ថា "ពួកគេប្រព្រឹត្តមកលើប្រជាជនតាមអំពើចិត្ត។ មិនមានសេវាសាធារណៈក្នុងប្រទេសនេះទេ មានតែមន្ត្រីគណបក្សប៉ុណ្ណោះនៅទីនេះដើម្បីត្រួតត្រាប្រជាជន ហើយពួកគេគិតថា ពួកគេមានសិទ្ធិសម្លាប់ប្រជាជន"។

លោក សៃម៉ុន ស្ត្រីងហ្គើ សាស្ត្រាចារ្យនៅសាកលវិទ្យាល័យ វីធើវៀ នៅក្នុងប្រទេសកាណាដា ដែលបានសិក្សាអំពីការវិវឌ្ឍផ្នែកនយោបាយនៃប្រទេសកម្ពុជាក្នុងរយៈពេល១០ឆ្នាំមកនេះ បានមានប្រសាសន៍ថា នៅពេលមានការគំរាមកំហែងដល់អំណាច និងការត្រួតត្រារបស់គណបក្សប្រជាជនកម្ពុជាអំពើហិង្សាគឺជាយន្តការសម្រាប់ការពារ។

លោក ស្ត្រីងហ្គើ បានមានប្រសាសន៍ថា "មន្ត្រីនេះ ឱ្យអ្នកបាញ់សម្លាប់ អេង សុខុម មិនមែនជាអ្នកប្រើអំពើហិង្សានេះពិតប្រាកដទេ គាត់គ្រាន់តែជាតួអង្គធម្មតានៅក្នុងរឿងដ៏វែងមួយដែលយកអំពើហិង្សាធ្វើជាតម្លៃនៃការធ្វើពាណិជ្ជកម្ម។ អំពើហិង្សាជាធម្មតាមានន័យស្មើនឹងពាណិជ្ជកម្ម ហើយឥឡូវនេះគួរឱ្យសោកស្តាយណាស់ដែលពាណិជ្ជកម្មនៅកម្ពុជាដំណើរការល្អ"។

លោក សុក សំអឿន មេធាវីជំនួយផ្នែកច្បាប់ដ៏ឆ្នើមមួយរូបដែលបានគ្រប់គ្រងសាលាបណ្តុះបណ្តាលនគរបាលរបស់អង្គការសហប្រជាជាតិនៅក្នុងជំរំជនភៀសខ្លួនតាមបណ្តោយព្រំដែនថៃកាលពីទស-វត្សរ៍ឆ្នាំ១៩៨០ បានមានប្រសាសន៍ថា នគរបាលកម្ពុជាបំពេញការងារដូចជាកងកម្លាំងយោធា ហើយគោលបំណងរបស់យោធា គឺសម្លាប់ និងការពាររដ្ឋ។

លោក សុក សំអឿន បានមានប្រសាសន៍ថា "នគរបាលកម្ពុជាមិនបានទទួលការបណ្តុះបណ្តាលគ្រប់គ្រាន់ទេ ហើយការបណ្តុះបណ្តាលដែលពួកគេទទួលបាន គឺថតចម្លងចេញពីទាហាន និងកងរាជអាវុធហត្ថ"។ លោកបានពន្យល់ថា ការបណ្តុះបណ្តាលរបស់យោធាយកតម្លៃនៃវិន័យ និងឋានន្តរសក្តិធំជាងអ្វីៗទាំងអស់។ "ពេលចូលវគ្គបណ្តុះបណ្តាលទាហានត្រូវបានបង្រៀនឱ្យចេះស្តាប់បញ្ជា។ ពួកគេមិនធ្វើឱ្យច្បាប់មានតុល្យភាពជាមួយបទបញ្ជាទេ"៕ **គីមហឿន**

# ផ្លែក្រូចឃ្វិចមានប្រសិទ្ធភាពក្នុងការបង្ការជំងឺផ្សេងៗ



» ក្រូចខ្វិចគឺជាប្រភេទផ្លែឈើដែលមានគុណប្រយោជន៍ច្រើនសម្រាប់សុខភាព ។ នៅក្នុងផ្លែក្រូចខ្វិច១០០ក្រាម អាចផ្តល់វីតាមីន C ៤២មីលីក្រាម និងវីតាមីនA ខ្ពស់ ហើយថែមទាំងមានវីតាមីន B និងជាអាហារដែលសម្បូរទៅដោយកាកសរសៃជាច្រើនទៀតផង ។ ប្រសិនបើលោកអ្នកបានទទួលទានវាជាប្រចាំថ្ងៃនោះ គឺពាក្យថាទល់លាមកកើតរោគផ្តាសាយកូឡេស្តេរ៉ុលឡើងខ្ពស់នោះ គឺលែងមករំខានសុខភាពរបស់លោកអ្នកបានទៀតឡើយ ។

មិនតែប៉ុណ្ណោះវាក៏ជួយឱ្យឆ្អឹងរឹងមាំ និងជួយការពារក្រុសនៅក្នុងតម្រងនោមការពារមហារីកពោះវៀនធំ និងធ្វើឱ្យរាងកាយចៀសផុតពីរោគបេះដូងបានទៀតផង ។ ប្រការដែលល្អលោកអ្នកគួរបរិភោគផ្លែក្រូចខ្វិចជារៀងរាល់ថ្ងៃដើម្បីទទួលបានបានសុខភាពល្អ ៕

# បរិភោគសាច់ត្រីជួយឱ្យសុខភាពល្អ

ត្រីគឺជាអាហារដ៏ល្អសម្រាប់សុខភាព ពីព្រោះនៅក្នុងសាច់ត្រីវាសម្បូរទៅដោយប្រភពនៃវីតាមីនជាច្រើន ដូចជាអូមេហ្គា៣ និងវីតាមីនជាច្រើនទៀត ជួយដល់សុខភាព មានដូចជា :

- **ជំនួយខួរក្បាល និងភ្នែក :** អូមេហ្គា៣នៅក្នុងសាច់ត្រីអាចជួយឱ្យខួរក្បាលមានការចងចាំបានល្អ និងជួយឱ្យភ្នែកភ្លឺច្បាស់ចៀសផុតពីការងងឹតភ្នែក ។
- **កាត់បន្ថយរោគមហារីក :** ប្រសិនបើអ្នកបរិភោគត្រីជាប្រចាំថ្ងៃអាចជួយកាត់បន្ថយ



មហារីកគ្រប់ប្រភេទរហូតទៅដល់៣០ទៅ៥០ភាគរយ ជាពិសេសនោះគឺមហារីកបំពង់អាហារ មហារីកពោះវៀនធំ មហារីកផ្លូវដង្ហើម មហារីកសួត មហារីកក្រពេញប្រូស្តាត ។

- **កាត់បន្ថយជំងឺសរសៃឈាមបេះដូង :** ញ៉ាំត្រីជាប្រចាំថ្ងៃអាចជួយកាត់បន្ថយអាការជំងឺសរសៃឈាមដែលបង្កឱ្យមានបញ្ហាបេះដូង ។
- **កាត់បន្ថយរោគទឹកនោមផ្អែម :** ញ៉ាំត្រីជាទៀងទាត់ប្រចាំថ្ងៃអាចគ្រប់គ្រងសម្ពាធស្ករនៅក្នុងឈាមឱ្យបានល្អ ។
- **ជួយកាត់បន្ថយរោគហឺត :** មនុស្សដែលចូលចិត្តញ៉ាំសាច់ត្រីមានលទ្ធភាពតិចតួចបំផុត នៅក្នុងការកើតជំងឺហឺត ។ ហេតុដូច្នេះហើយទើបបានជាគេណែនាំឱ្យមនុស្សបរិភោគសាច់ត្រីជាប្រចាំនោះ ៕

# រុនតាឯកនៅសៀមរាប ជាទីចំណាប់អារម្មណ៍ទេសចរ

ភូមិធម្មជាតិរុនតាឯក

ឥឡូវនេះគេឃើញមានវត្តមានភ្ញៀវយ៉ាងច្រើនបាននាំគ្នាចាប់អារម្មណ៍តំបន់ទេសចរណ៍បែបប្រពៃណីមួយឈ្មោះភូមិអេកូទេសចរណ៍រុនតាឯកដែលជាភូមិឋានមានទេសភាពធម្មជាតិព័ទ្ធដោយបឹងជាលាធំស្ថិតនៅក្នុងខេត្តសៀមរាប។ ភូមិអេកូទេសចរណ៍រុនតាឯកនេះបានផ្តល់នូវបទពិសោធនៃប្រពៃណីច្រើនសម្រាប់អ្នកទេសចរ ខណៈវាក៏កំពុងតែក្លាយជាទិសដៅកម្សាន្តរបស់ភ្ញៀវភាគច្រើនផងដែរ។





អ្នកស្រីហាក់ធីតាប្រជាពលរដ្ឋដែលពីមុនមានលំនៅឋានរស់នៅតាមដងស្ទឹងសៀមរាប និងត្រូវបានក្រុមអាជ្ញាធរប្តូរឱ្យទៅនៅភូមិរុនតាឯកជាមួយនឹងប្រជាជន៥៣គ្រួសារទៀត កាលឆ្នាំ២០១០។

អ្នកស្រីនិយាយថាៈឪអាជ្ញាធរបានពន្យល់ពួកយើងថាភូមិថ្មីនោះនឹងមានគម្រោងបង្កើតជាភូមិអេកូទេសចរណ៍ហើយនឹងផ្តល់ពូជដំណាំនានាឱ្យពួកយើងដាំនិងចិញ្ចឹមសត្វ។

អ្នកស្រីក៏បានបញ្ជាក់ដែរថា ក្រុមភ្ញៀវទេសចរចូលចិត្តមកទស្សនានិងស្នាក់នៅក្នុងភូមិពួកគាត់ណាស់ដើម្បីទទួលបានបទពិសោធ និង

**តទៅទំព័រទី ២៩**

# សក់ទន់ ហើយរលោងស្អាត

▸ ប្រសិនបើសុភាពស្ត្រីទាំងឡាយនាងមានបំណងប្រាថ្នាឱ្យសរសៃសក់ខ្លួនឯងទន់ហើយរលោងស្អាតទៀតនោះ ចាប់ពីពេលនេះទៅពិតជាលែងចោទជាបញ្ហាទៀតហើយ ។ ក្នុងនោះយើងណែនាំឱ្យនាងលួចសង្កេតសរសៃសក់ខ្លួនឯងឱ្យច្រើនជាងពេលមុនៗថា តើសរសៃសក់របស់ខ្លួនឯងកំពុងធ្លាក់ក្នុងស្ថានភាពប្រឈមនឹងអ្វីខ្លះ ដូចជាសរសៃសក់ចាប់ផ្តើមជ្រុះកម្រាស់ស្តើងកាន់តែស្តើងមានអារម្មណ៍ថាសរសៃសក់ក្រៀមស្ងួតជាងពេលមុនសក់បាត់បង់ទម្ងន់សក់បែកចុងជាដើម ។

ដូច្នេះក្រោយពេលតាមដានសង្កេតរហូតរកឃើញមូលហេតុពិតប្រាកដហើយនោះ លើកនេះនាងងាកមកចាប់ផ្តើមអនុវត្តន៍ផែនការណ៍ស្តារស្ថានភាពសរសៃសក់ តាមដំបូន្មានដូចខាងក្រោមនេះ :

ជាធម្មតាសរសៃសក់របស់មនុស្សយើងជាមធ្យមមានចំនួនប្រហែល១សែនសរសៃ ហើយសរសៃសក់ក្នុងមួយសរសៃមានអាយុរបស់វាប្រមាណ១០០០ថ្ងៃ លុះសរសៃមានអាយុកាលដល់កំណត់វានឹងចាប់ផ្តើមជ្រុះរួចហើយមានសរសៃសក់ថ្មីដុះឡើងមកជំនួស។ ក្នុងករណីបើសរសៃសក់អ្នកជ្រុះក្នុងមួយថ្ងៃពី៥០-៦០សរសៃ សូមកុំទាន់ស្លន់ស្លោរភ័យធ្វើអ្វី ព្រោះនោះជារឿងធម្មជាតិរបស់សរសៃសក់ ។

លើសពីនេះទៅទៀតពេលឈានចូលរដូវដែលមានអាកាសធាតុក្តៅហែងដូចសព្វថ្ងៃនេះ សរសៃសក់ និងដុះកាន់តែលឿនតែល្បឿននៃការដុះនេះ វានឹងយឺតទៅវិញក្នុងករណីមានរោគាឈឺថ្កាត់ឬក៏ព.ផ្ទៃពោះ ។ រីឯវិធីធ្វើបែបណា ដើម្បីឱ្យសរសៃសក់ខ្មៅរលោងស្អាតវិញនោះ ក្រៅពីប្រើវិធីព្យាយាមផ្តល់ការថែទាំក្នុងរឿងអនាម័យហើយ គួរផ្តោតសំខាន់ទៅលើការប្រើប្រាស់ផលិតផលសម្អាងជាជំនួយចំណុចសំខាន់មុននឹងឈោងដៃចាប់វាយកមកប្រើគួរដឹងមុនថា ផលិតផលនោះវាស័ក្តិសមនឹងស្ថានភាពសរសៃសក់យើងដែរឬអត់ ?

ក្រៅពីនេះទៀតក៏ទាមទារឱ្យមានការថែទាំដំណើររួមគ្នា និងអាហារទទួលទានដែលផ្តល់ជាប្រយោជន៍ល្អៗដល់សុខភាពផងដែរ ។ ចំណែកការធ្វើលំហាត់ប្រាណរៀងរាល់ថ្ងៃក៏ហុចផលល្អក្នុងរឿងនេះដូចគ្នា ជាពិសេសប្រសិនបើអ្នកមិនចង់ឱ្យសក់ជ្រុះទេនោះ ព្យាយាមធ្វើអារម្មណ៍ឱ្យស្រស់ស្រាយនោះជឿជាក់ចុះថា សរសៃសក់ខ្លួនឯងនិងទន់រលោងស្រស់ស្អាតជាមិនខាន ៕

តមកពីទំព័រទី ៤ លាហើយប៉ារីស...

គ្រាប់ជាងគំនូរចំណាន១មកបង្ហាញស្នាដៃបន្តបន្ទាប់គ្នានៅពីមុខទស្សនិកជនរាប់រយនាក់ដែល



មកអង្គុយកំសាន្តនៅមាត់ជណ្តើរដ៏ធំមួយរង់ចាំកំសាន្តទស្សនីភាពណាមួយដែលនឹងកើតឡើងចំពោះមុខខ្លួន ដែលឆាកសម្តែងទាំងមូល គឺក្រុងប៉ារីសដ៏អស្ចារ្យដែលនៅពីក្រោមជើងនោះឯង ។

មុននឹងចេញពីរមណីយដ្ឋានគេមិនភ្លេចនឹងទៅបន្តកន្ទុយចូលក្នុងវិហារដែលចម្រៀងជាពួក "គ្មោស្បៃល"បន្តសរសើរពីគុណសម្បត្តិព្រះគ្រីស្ទយ៉ាងពិរោះគ្រលួច ហើយគេទិញវត្ថុអនុស្សាវរីយ៍មានទាំងគម្ពីរ រូបចម្លាក់...យកទៅផ្ទះផង ។

ថ្ងៃចេញដំណើរមកដល់យ៉ាងលឿន រយៈពេលមួយខែវិលរាប់ពុំទាន់ថ្ងៃ២០តុលាបាននាំយើងឱ្យមកដល់ចំណតយន្តហោះ២ម៉ោងមុនពេល ដូចកំណត់ តែពីម៉ោងមុននោះបែរជាមិនគ្រប់គ្រាន់ក្រុមហ៊ុន (Air France) បានប្រកែកមិនឱ្យយើងឡើងយន្តហោះដោយថា យើងមកយឺតពេលបណ្តាលឱ្យដំណើរយើងលើកទៅថ្ងៃស្អែកហើយពិន័យអស់ $200ពីលើនោះទៀត ។

ស្អែកឡើងបានមកដល់ផ្ទះនៅឡូវែលទាំងអស់គ្នាដោយសុវត្ថិភាព ។ ខ្ញុំ-សុបិន និងប៊ុណ្ណារ៉ូ ទោះជានឿយហត់ក្នុងដំណើរវិស្សមកាលយ៉ាងវែង បានទទួលនូវការបន្ធូរបរិយាកាលតឹងតែងតែរៀងៗខ្លួន ហើយចាប់បន្តការងារប្រចាំថ្ងៃ ដូចសព្វមួយដងមកវិញ ៕

តពីទំព័រទី១៦

# ព័ត៌មានសង្ខេបក្នុងតំបន់ និងក្រៅតំបន់

## កម្មវិធីទូរទស្សន៍ជីវិតថ្មី

**៣**-កម្មវិធីទូរទស្សន៍ ជីវិតថ្មី ដឹកនាំដោយលោក ស៊ីដនី លាង បានទទួលពានរង្វាន់ពី អិល ធី ស៊ី (LTC) កាលពីថ្ងៃទី ២១ វិច្ឆិកា ឆ្នាំ២០១៣។

Sidney Liang, producer of Jivit Thmei. Winner for the Best Global 95 Show at LTC's annual Members Meeting is November 21, 2013





# វត្តសូរិយារង្សីនៅហ្វីឡាដែលហៀរនៅតែបន្តមានជំលោះ

**តពីលេខមុន**

ទៅមុខទាំងមួរម៉ងចិត្តទៅ។ ចុះអ្នកណាសប្បាយអីក្នុងការរង់ចាំដំណឹងពីតុលាការ? ក្រុមចាស់ក៏ដូចក្រុមថ្មីមិនមែនសប្បាយចិត្តទៅឈរមុខវង់ក្រចកសេះចាំស្តាប់ចៅក្រំកាត់ទោសខ្លួននោះអីទេ។ បើដូច្នោះក្នុងនាមជាបងប្អូនរួមឈាមកំសត់កម្រជាមួយគ្នាពីបាកអីនឹងវិលមករកគ្នាផ្សះផ្សារដំបៅឱ្យគ្នាទៅវិញទៅមកដោយក្តីអាណិតស្រឡាញ់នៃជនជាតិមួយដែលត្រូវជាតិគេមួយទៀតជិះជាន់ធ្វើបាបងើបមុខមិនរួចរាប់សតវត្សមកហើយមិនគិតទៅគិតអីរឿងចាញ់ឈ្នះគ្នាឯងបន្តិចបន្តួចប៉ុនចុងចង្កឹះនេះ។ កុំភ្លេចថា ខ្ញុំរង់ចាំបំរើបងប្អូនដោយសប្បាយរីករាយក្នុងការផ្សះផ្សារបងប្អូនយើងនេះ.កុំភ្លេចសរសេរមកបញ្ជាខ្ញុំថាត្រូវឱ្យខ្ញុំធ្វើយ៉ាងណា ដើម្បីបងប្អូនយើងអាចជួបគ្នាពន្លត់ភ្លើងនេះឱ្យទាន់ពេលមុនតុលាការគោះញញួរបញ្ចប់សេចក្តីធ្វើឱ្យខ្មែរខាតបង់ទាំងអស់គ្នា.ប្រញាប់ឡើងណាបងប្អូន!!! ៕ **ដោយៈ គីម ភឿន**

**ចប់បរិបូរណ៍**

# ដំណឹងចុងក្រោយបំផុត

**ដោយ : គីម ភឿន**




ពេលសរសេរអត្ថបទមួយមានចំណងជើងថា "ខ្ញុំឡើងតុលាការ"ចប់បានមួយសន្ទុះភ្លាម ក៏បានព្រះសង្ឃព្រះនាម យ៉ាន់ តួន ទូរស័ព្ទមកជូនដំណឹងមួយ គួរឱ្យរីករាយខ្លាំងណាស់ ។ ដំណឹងនេះខ្ញុំកាត់យល់ថា ការប្តឹងផ្តល់នេះជិតទៅដល់ទីបញ្ចប់ហើយ ។ នេះជាដំណឹងល្អសំរាប់យើងជាខ្មែរដែលចង់សុំតែសេចក្តីសុខក្នុងភាពស្ងប់ហើយនាំគ្នា និងបែរមករកគ្នាជាបងប្អូនរួមឈាមដដែលវិញ ។ ខាងក្រោមនេះជាដំណឹងល្អ :

ដំណឹងចុងក្រោយថ្ងៃនេះ គឺថ្ងៃទី២០ វិច្ឆិកា ឆ្នាំ២០១៣ ម៉ោង ១:៥២ល្ងាច ព្រះអង្គយ៉ាន់ តួ បានទូរស័ព្ទជូនព័ត៌មានថា ដោយខ្ញុំ គីម ភឿន នៅស្តាប់តុលាការពុំដល់ទីបញ្ចប់សវនាការថ្ងៃទី ១៥/១១/១៣ នោះទើបមិនជ្រាបព័ត៌មានចុងក្រោយនេះ ។ នៅមុនពេលបិទសវនាការថ្ងៃនោះតុលាការបានប្រកាសយ៉ាងច្បាស់ថា ការប្តឹងផ្តល់ពីរឿងបោះឆ្នោតនោះត្រូវបានចាត់ទុកជាមោឃៈ រឿងដេញព្រះសង្ឃចេញពីវត្ត ក៏មិនបានត្រូវយល់ព្រមពីតុលាការឡើយ ប្រសិនបើដើមចោទមានការអ្វីផ្សេងតវ៉ាទៀត អាចតវ៉ាបាន តែរឿងបោះឆ្នោតត្រូវចប់តែត្រឹមហ្នឹង ព្រោះរឿងបោះឆ្នោតសារឡើងវិញ ដូច្នោះបានទេ ។ តុលាការបានឱ្យយោបល់ថា គូវិវាទគួរតែរកឱកាសជួបគ្នា ធ្វើការជាមួយគ្នាឡើងវិញ ។ ខ្ញុំសុំទោសដោយមិនអាចនិយាយសារឡើងវិញដូចភាសាតុលាការបានប្រកាសមកនោះទេ វាតែងឃ្លៀងឃ្លោងបន្តិចហើយ ។ តែអង្គសេចក្តីមានន័យយ៉ាងនោះ ប្រហែលខាងដើមចោទមិនព្រមឈប់ទេ ទើបមានសវនាការនៅថ្ងៃទី ២ និងទី៣ សូមរង់ចាំអាន"ខ្ញុំឡើងតុលាការ" នៅលេខបន្តខែ ធ្នូ ២០១៣ ទៀត សូមអញ្ជើញបងប្អូនទាំងឡាយអញ្ជើញមកស្តាប់ឱ្យបានច្រើន

# ដំណឹងល្អ




លោកតាម្នាក់មានជំងឺមហារីកថ្លើមដល់ថ្នាក់ក្រិនជិតអស់ថ្លើមទាំងមូលហើយ១ អាយុជិត៨០ឆ្នាំទៅហើយនោះអាចមើលជាបាន ។

ដូច្នេះប្រសិនបើលោកអ្នក ឬសាច់សារលោហិតណារបស់លោកអ្នកមានជំងឺមហារីក រហូតដល់គ្រូពេទ្យបារាំង ឬអាមេរិកាំងមើលមិនជាឱ្យចេញពីពេទ្យមកផ្ទះវិញនោះ កុំអាលអស់សង្ឃឹម សុំទាក់ទងនឹងគ្រូផ្សំថ្នាំបូរាណខ្មែរ ផ្សំនឹងប្រតិបត្តិវិបស្សនាកម្មដ្ឋាន អាចជួយឱ្យអស់លោកអ្នកបានជាសះស្បើយមិនខាន ។ អាចព្យាបាលគ្រប់នៃមហារីក, មហារីកសួត, ថ្លើម, ក្រពះ, មាត់ស្បូន, ។ល ។

សុំទាក់ទងនិងលោកគ្រូពេទ្យ គីម ភឿន ទូរស័ព្ទលេខ ២៦៧-៤២៣-៨១៨៧ ដើម្បីបានជ្រាបពីព័ត៌មានពិសេសនេះលំអិតបន្ថែម ។

# វិស្វកម្មក្នុងចិត្តមនុស្ស
# The human inner engineering

តពីលេខមុន

តទៅលេខក្រោយ


និពន្ធដោយ : ម៉ៅ ច័ន្ទសំណុំ

នេះជាគោលធម៌ខ្ពស់បំផុត គួរចងចាំជាប់ជានិច្ច គួររំលឹកគោលការណ៍នេះជារឿយៗនេះ សតិដឹងនឹងចាប់ផ្តើមដុះរីកលូតលាស់ធំឡើងប្រៀបដូចព្រះសូរិយារះឡើងពីទិសខាងកើត ដូច្នេះឯងចូរព្យាយាមឡើង ចូរព្យាយាមឡើង។

៣.ខ្ញុំសូមរៀបរាប់រាយលំអិតអំពីរបៀបបង្កើតបណ្តុះសតិ និងការប្រើប្រាស់សតិក្នុងជីវិតជាក់ស្តែង ។ របៀបដែលខ្ញុំនឹងជំរាបតទៅនេះ គឺជាវិធីបើកសតិទូលាយក្នុងជីវិតរស់នៅប្រចាំថ្ងៃ ឬគេហៅម្យ៉ាងទៀតថា វិធីតាំងខ្លួនក្នុងពេលបច្ចុប្បន្ននេះឯង To be in the PRESENT ។ នេះគឺជាវិធីដែលខ្ញុំដកស្រង់គំនិតទស្សនៈមកពីអ្នកប្រាជ្ញអល្លឺម៉ង់ម្នាក់ដែលកំពុងតែល្បីល្បាញលើសកលលោកនេះ គឺលោក FLORIAN SCHLOSSER ខ្ញុំសូមពិចារណាវិធីនេះ ដូចខាងក្រោមនេះ :

នៅពេលដែលសតិដឹងនេះ ស្ថិតនៅក្នុងខួរក្បាល ពេលនេះមនុស្សប្រើប្រាស់ព័ត៌មានពីក្នុងឃ្លាំងម៉េម៉ូរីមកប្រើ ព័ត៌មានដែលបានកត់ទុកម៉េម៉ូរី លំហូរគំនិតផុះមកឡើងផ្តាលៗ ហូរដូចទឹកពុំចេះចប់ ដូចខ្ញុំពិព័ណនាពីមុន ។

ឥឡូវបើអ្នកមានគំរោងចង់សំរាកខួរក្បាលបន្ទូរអារម្មណ៍ស្វែងរកភាពស្ងប់ សេរីភាព សន្តិភាព ប្រាជ្ញា ភ្លឺថ្លា និងបណ្តុះសតិឱ្យធំឡើងៗឱ្យកាន់តែពណ្ណរាយឡើងៗអ្នកអាចប្រណិបត្តិបានភ្លាមៗតាមរបៀប ដូចខាងក្រោមនេះ :

១.ចូរទំលាក់សតិពីខួរក្បាល ចុះមកដងខ្លួន ហើយចូរបើកញាណទាំង៥ ឱ្យធំទូលាយឡើង។ ញាណទាំង៥នោះមាន ភ្នែក ច្រមុះ ត្រចៀក អណ្តាត ស្បែក ។ ចូរអនុវត្តន៍តាមគោលការណ៍ដូចតទៅ :

ក.ចូរពិសោធន៍ធាតុភូតនានាជុំវិញខ្លួន ធាតុភូតលើខ្លួនធាតុភូតក្នុងខ្លួន ។ ចូរពិសោធន៍ដោយផ្ទាល់ និងពិតៗក្នុងខណៈនោះ ក្នុងពេលនោះតែម្តង Experience things as they are ។

២.អ្នកមាននាទីត្រឹមតែកត់សម្គាល់ប៉ុណ្ណោះ you Juot note,that is it ។ ពុំអនុញ្ញាតឱ្យប្រើខួរក្បាលគិតពិចារណារបៀបធៀបបកស្រាយអ្វីឡើយ អ្នកប្រៀបដូចជាកញ្ចក់ឆ្លុះមុខដូច្នោះឯង។

គ.ចូរបើកសតិឱ្យទូលាយឱ្យធំឡើងៗ ចូរអនុញ្ញាតបលើកទូលាយលើរាល់ធាតុភូតវត្ថុនានាដែលកំពុងសំដែងឡើងកំពុងផុះឡើងក្នុងខណៈនីមួយៗពុំរើសអើងអ្វីឡើយ។ ឧទាហរណ៍ ការមើលជុំវិញខ្លួន សូមទទួលដឹងអ្វីៗទាំងអស់ដែលកំពុងតែផុះឡើងក្នុងរង្វង់ចក្ខុពុំដកហូតអ្វីចេញឡើយ ឬរើសអើងអ្វីឡើយ ឬពុំរើសតែរបស់ណាពេញចិត្ត ហើយគេចវេសរបស់ពុំពេញចិត្តឡើយ ។ ព្រមទទួលទាំងអស់ទាំងល្អ ទាំងអាក្រក់ ទាំងធំ ទាំងតូច ទាំងជិត ទាំងឆ្ងាយ ទាំងអស់ ទាំងអស់ពុំរើសឡើយ ។ នេះគឺជាគោលការណ៍បើកចំហរ និងស្វាគមន៍ ដូចខ្ញុំជំរាបជូនពីមុនស្រាប់ ។(Allow Ane include eveny thing) ។

សូមអ្នកពិសោធន៍ជាក់ស្តែង នាពេលនេះជាមួយខ្ញុំដូចខាងក្រោមនេះ ការបើកញ្ញាណទាំង ៥ ចូរអ្នកបើកភ្នែកមើលវត្ថុ និងធាតុភូមិនានាជុំវិញខ្លួន។

ចូរកុំគិតពិចារណាអ្វីឡើយ បើឃើញ គឺត្រឹមតែឃើញប៉ុណ្ណោះ (ការឃើញ) កើតឡើងដោយឯកឯងអ្នកពុំបានប្រឹងឡើយ ។ ពេលនេះភ្នែកអ្នកប្រៀបដូចជាកញ្ចក់ដែលឆ្លុះចាំងរូបនានានៅជុំវិញតាមសភាពពិតរបស់វាពុំរើសមុខឡើយ ។ ចូរមើលវត្ថុធាតុភូតនានាទៅតាមសភាពពិតរបស់វា (SEE THINGS AS THEY ARE) នេះជាការអនុវត្តន៍សមាធិវិបស្សនាក្នុងជីវិតជាក់ស្តែង។

ចូរបើកត្រចៀកស្តាប់សំឡេងនានាដែលកំពុងតែផុះឡើងនៅជុំវិញខ្លួននាខណៈនោះ ដូចជាសំឡេង សត្វយំ សំឡេងឡានបើកសំឡេងទឹកហូ សំឡេងមនុស្សជជែកគ្នាសំឡេងភ្លៀងធ្លាក់ ។ ចូរកុំគិតពិចារណាអ្វីឡើយ ។ បើឮគឺត្រឹមតែឮប៉ុណ្ណោះ ត្រចៀកពេលនេះប្រៀបដូចជាកញ្ចក់ដែលឆ្លុះចាំងសំឡេងនានា តាមសភាពពិត នាពេលនោះ (HEARING NOISES AS THEY ARE) ។

ចូរទទួលដឹងបរិយាកាសជុំវិញខ្លួន(តាមរយៈស្បែកបនាខណៈនោះ។ អ្នកអាចដឹងថា អាកាសធាតុ ក្តៅ ត្រជាក់ ស្រួល ធូរស្រាល ស្អុះស្អាប់ ស្បែកមុខទទួលប៉ះខ្យល់ត្រជាក់រងាស្រៀវដល់រូបកាយទាំងមូល។

ចូរកុំប្រើខួរក្បាលពិចារណារកហេតុផលអ្វីឡើយ ត្រឹមតែទទួលដឹងនោះ គ្រប់គ្រាន់ហើយ ។ ស្បែកអ្នកមាននាទីដូចកញ្ចក់ដែលឆ្លុះចាំងរាល់ទិដ្ឋភាពជាក់ស្តែង និងកំពុងប្រព្រឹត្តទៅ (FEEL-ING THINGS AS THEY ARE) ។

តទៅលេខក្រោយ

# ជោគជតារាសីលោកអ្នក

## ទាំង១២ប្រចាំឆ្នាំរោង



### ឆ្នាំជូត

អាចពោលបានថា លោកអ្នកមានសេចក្តីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរ នៅទីណាក្តីគួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕

### ឆ្នាំឆ្លូវ

លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះ វាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់ បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហាពុំមានផលរមាស់អ្វីនោះឡើយ ៕

### ឆ្នាំខាល

រាល់ការស្មុគស្មាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះនឹងត្រូវអហោសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែមទើបជាការប្រសើរ ៕

### ឆ្នាំថោះ

រាល់កិច្ចការដែលលោកអ្នកប៉ងប្រាថ្នាជាយូរមកហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណង ហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងឃាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហាគូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕

### ឆ្នាំរោង

រាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះ សូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕

### ឆ្នាំម្សាញ់

រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗ នាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់ បើអាចរកផលកម្រៃត្រឡប់មកផ្ទះវិញយ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀបដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕

### ឆ្នាំមមី

លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទីឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះ ប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបានដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ អាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕

### ឆ្នាំមមែ

រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះសុទ្ធតែផ្តល់នូវអត្ថប្រយោជន៍ គួរឱ្យជាទីពេញចិត្តទាំងអស់គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចម្រើនល្អលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នាបើនៅឆ្ងាយ ៕

### ឆ្នាំវក

នៅក្នុងរយៈពេលនេះលោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិនិងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផល កម្រៃទទួលបានកាក់កបគ្រាន់បើតែហាមកុំជួញដូរផ្លូវឆ្ងាយប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕

### ឆ្នាំរកា

ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕

### ឆ្នាំច

លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្តីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមួលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្អុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្សតាមឈ្នានីសច្រើន ដូច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕

### ឆ្នាំកុរ

លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗ ទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្តាប់ឱវាទគ្នា ៕

តមកពីទំព័រទី ២៣ **រុនតាឯកនៅខេត្តសៀមរាប...**

មើលឃើញពីជីវិតបែបជនបទរបស់ប្រជាជន។

នារដូវរំហើយខែមករា និងកុម្ភៈមានទេសចរជាច្រើនបានមកទស្សនាទីនេះបន្ទាប់ពីពួកគេទៅទស្សនាប្រាសាទបុរាណនានាក្នុងខេត្តសៀមរាប ព្រោះពួកគេចង់ឃើញពីជីវភាពរបស់ប្រជាជនខ្មែរនៅទីនេះ។

ភ្ញៀវអាចទទួលបាននូវចំណេះដឹងផ្នែកវប្បធម៌ចម្រុះសម្រស់ធម្មជាតិជុំវិញភូមិឋាន និងភ្លក្សអាហាររបស់ប្រជាជនខ្មែរផងដែរ។

ផ្ទះពួកយើងមិនមានបណ្តាញភ្លើងអគ្គិសនីឡើយដោយសារអាជ្ញាធរបានសង់ប្រព័ន្ធចរន្តថាមពលពន្លឺព្រះអាទិត្យ ។ តែក្រុមទេសចរនៅតែមានការពេញចិត្តដដែលជាមួយនឹងការស្នាក់នៅផ្ទះរបស់ពួកយើង ព្រោះវាជាទេសភាពមានដើមឈើបន្លែបង្ការ និងផ្កាលាយឡំគ្នានឹងមានអាកាសធាតុត្រជាក់ស្រួលនាពេលរាត្រី។

ពួកយើងស្វាគមន៍ភ្ញៀវទេសចរមកស្នាក់នៅទីនេះជាមួយនឹងតម្លៃ៨ដុល្លារក្នុងមួយយប់។

គម្រោងភូមិអេកូទេសចរណ៍រុនតាឯកនឹងត្រូវពង្រីកលើផ្ទៃដី១០១២ហិកតាដោយអាជ្ញាធរអប្សរា។ បច្ចុប្បន្នមានផ្ទះចំនួន៩៦ខ្នងសង់ពីឈើដំបូលក្បឿងបែបខ្មែរតែមានតែ៤១គ្រួសារប៉ុណ្ណោះដែលរស់នៅក្នុងភូមិជាអចិន្ត្រៃយ៍។

លោក នេប ម៉ាលីល បម្រើការងារជាអ្នកប្រឹក្សាកសិកម្មបាននិយាយថា ភូមិនេះមានទីតាំងល្អ និងជាកន្លែងទាក់ទាញទេសចរមកទស្សនាច្រើនគួរសម។

លោកឱ្យដឹងទៀតថា: ភូមិនេះមានលក្ខណៈល្អច្រើនសម្រាប់ទេសភាពជនបទ ហើយក្រុមភ្ញៀវទេសចរអាចសិក្សាស្វែងយល់ពីជីវភាពរបស់អ្នកភូមិបានផងដែរ ក្រៅពីការទស្សនាសំណង់ប្រាសាទបុរាណ។ យើងក៏មានរៀបចំបម្រើសេវាកម្មម្ហូបអាហារខ្មែរ និងកន្លែងស្នាក់នៅដោយប្រើកន្ទេលទៀតផង។

លោកបន្ថែមថាគេបានជ្រើសរើសគ្រួសារអ្នកភូមិគំរូដែលមានទឹកចិត្តស្រឡាញ់បរិស្ថានធម្មជាតិបៃតង។ ក្រុមអាជ្ញាធរក៏លើកទឹកចិត្តប្រជាជនក្មេងៗ និងក្រុមគ្រួសារថ្មីៗឱ្យទៅរស់នៅក្នុងភូមិឋាននោះស្ម័គ្រចិត្តផងដែរ។

អ្នកភូមិភាគច្រើនមកទីនេះមិនមានរបរអ្វីទេ។ ដូច្នេះខ្ញុំបានបង្ហាត់បង្រៀនពួកគាត់ឱ្យចេះដឹងពីរបៀបដាំដុះចិញ្ចឹមសត្វពាហនៈនានា និងត្រីជាដើម។ ពួកគាត់កំពុងតែមានការពេញចិត្តនឹងជីវភាពបែបនេះណាស់។

បើទោះជាមិនទាន់បញ្ជាក់ពីគម្រោងបង្កើតផ្សារនៅទីនោះក្តី ប៉ុន្តែនឹងមានការសង់មន្ទីរពេទ្យ





និងសាលារៀនក្នុងភូមិឋាន។

លោក ង៉ូវ សេង កាត់នាយកមន្ទីរទេសចរណ៍ខេត្តសៀមរាប បាននិយាយថា ភូមិនេះមានសារសំខាន់ណាស់ក្នុងការជួយទាក់ទាញបន្ថែមផ្នែកវិស័យទេសចរណ៍របស់ខេត្តសៀមរាប៕

# ខ្មែរអ្នកជាតិនិយម

តពីលេខមុន

កាលណារំដោះឥណ្ឌូចិនបានហើយ គេនឹងញបង្កើតសហព័ន្ធឥណ្ឌូចិនដែលដែលត្រូវស្ថិតនៅក្នុងសហភាពបារាំង ហើយបារាំងនឹងការពារផលប្រ-យោជន៍លើផ្ទៃអន្តរជាតិជំនួស ។ ឯរចនាសម្ព័ន្ធនៃសហព័ន្ធឥណ្ឌូចិននេះ មិនទាន់បានរៀបចំនៅឡើយទេ គ្រាន់តែមានពាក្យសន្យាខ្លះៗ ដូចតទៅ :

"ជនជាតិទាំងឡាយដែលនៅក្នុងសហព័ន្ធនឹងទៅជាពលរដ្ឋឥណ្ឌូចិនផង ជាពលរដ្ឋនៃសហព័ន្ធបារាំងផង ដែលនឹងអាចបំពេញមុខងារក្នុងរដ្ឋការសហព័ន្ធឥណ្ឌូចិន និងនៅក្នុងសហភាពបារាំង ។ សហព័ន្ធឥណ្ឌូចិនត្រូវមានរដ្ឋាភិបាលកណ្ដាលមួយដឹកនាំដោយអគ្គទេសាភិបាលម្នាក់ ។ ប្រទេសទាំង៥ដែលមានអរិយធម៌ និងជាតិសាសន៍ខុសគ្នា នឹងត្រូវរក្សាទុកនូវលក្ខណៈផ្ទាល់របស់ខ្លួននៅក្នុងសហព័ន្ធឥណ្ឌូចិន ។ល។"

សេចក្ដីប្រកាសនេះបានទៅដល់មូលដ្ឋាននៃខ្សែបន្ទាត់នយោបាយរបស់បារាំងក្នុងកម្លុងឆ្នាំក្រោយៗមកទៀត ។ ចំណែកឯនៅឥណ្ឌូចិនវិញ ក្រោយពីការរលំរលាយអំណាចបារាំងទៅ ហើយប្រទេសនៅឥណ្ឌូចិនក៏បានប្រកាសឯករាជ្យរៀងៗខ្លួនមកបញ្ហាកំណត់ព្រំដែនរវាងប្រទេសកម្ពុជា និងប្រទេសយួនក៏កើតមានឡើងភ្លាម ។

ថ្ងៃទី ១៧ មេសា ១៩៤៥ នៅប្រទេសយួនរដ្ឋាភិបាល ត្រឹង គីម បានត្រូវតែងតាំងឡើង ហើយក៏ចាប់ផ្ដើមគិតគូរបង្រួបបង្រួមប្រទេសយួនដោយបញ្ចូលដែនដីខ្មែរកូសាំងស៊ីនទៅក្នុងប្រទេសយួន ។ ថ្ងៃទី ១៨ មិថុនា ១៩៤៥ អធិរាជយួន បាវ ដាយ បានធ្វើសេចក្ដីថ្លែងការណ៍មួយបញ្ជាក់នូវគោលបំណងរបស់ខ្លួនថា ឯកភាពនៃប្រទេសវៀតណាមត្រូវនៅក្រោមការគ្រប់គ្រងរដ្ឋាភិបាលក្រុងហ្វេ មិនត្រឹមតែទ្រុងគី(អណ្ណាម,បាក់ គី (តុងកឹង)ប៉ុណ្ណោះទេ គឺថែមទឹកដីឯទៀតនៃអាណាចក្រផងដែរ ។ សេចក្ដីប្រកាសនេះបានធ្វើឱ្យប្រទេសកម្ពុជាមានប្រតិកម្ម ហើយព្រះចៅ សីហនុ ក៏បានតបទៅវិញនៅថ្ងៃទី ២៥ មិថុនា ១៩៤៥ មានសេចក្ដីថា ប្រទេសកម្ពុជាមិនអាចនៅព្រងើយកន្តើយ ចំពោះការផ្លាស់ប្ដូរលក្ខន្តិកៈនៃដែនដីមួយដែលខ្លួនកំពុងមានមានសិទ្ធិលើនោះបានឡើយ ហើយក៏ស្នើសុំឱ្យមានគណៈកម្មាធិការមួយសម្រាប់បញ្ជាក់ព្រំដែននៃប្រទេសទាំងពីរ ។

នៅចុងខែកក្កដា ឆ្នាំ១៩៤៥ ត្រឹង គីម បានធ្វើឱ្យជប៉ុនព្រមរំលាយរដ្ឋាបាលកណ្ដាលនៅឥណ្ឌូចិន ហើយដាក់តុងកឹងឱ្យនៅក្រោមឱវាទនៃរដ្ឋាភិបាលក្រុងហ្វេ ដោយបានតែងតាំងប្រតិភូអធិរាជម្នាក់នៅហាយណូយ ប៉ុន្តែជប៉ុនទុកកូសាំងស៊ីនឱ្យនៅក្រោមឱវាទរបស់ខ្លួនផ្ទាល់ ដោយបានតែងតាំងអភិបាលជប៉ុនម្នាក់ឱ្យទទួលខុសត្រូវ ។ ឯរដ្ឋាភិបាលកម្ពុជា ក៏បានបញ្ជូនលោក សឺន ង៉ុកថាន់ ជារដ្ឋមន្ត្រីក្រសួងការបរទេសនៅព្រៃនគរ ដើម្បីជួបពិភាក្សាជាមួយជប៉ុនស្នើសុំឱ្យគេប្រគល់កូសាំងស៊ីនទៅឱ្យយួន ។



និពន្ធដោយ ឡឹក សំអឿន ហៅ "ផ្កាយព្រឹក"

ក្នុងពេលនោះ ទិវាររវាងខ្មែរកម្ពុជាក្រោម និងយួនក៏ផ្ទុះឡើងវិញម្ដងទៀត គឺជាការតទល់ប្រយុទ្ធគ្នាដែលមានសភាពធ្ងន់ធ្ងរ មិនខុសពីជំលោះកាលពីឆ្នាំ១៨៦៣ ដែលត្រូវបានបង្ក្រាបដោល ដឹឡាក្រង់ឡៀរ អគ្គទេសាភិបាលបារាំងប្រចាំឥណ្ឌូចិននាសម័យនោះ ។ បណ្ដាជនខ្មែរកម្ពុជាក្រោមទាំងក្រុមៗប្រដាប់ដោយដាវលំពែង និងផ្គាក់ នាំគ្នាដើរជាជួរ ហើយវាយសំពងយួនទាំងអស់ដែលខ្លួនបានជួបប្រទះតាមផ្លូវ ។ ក្នុងភូមិខ្លះនៅកូសាំងស៊ីន គេបានឃើញសាកសពជាច្រើនអណ្ដែតតាមស្ទឹងតាមទន្លេ ។ អំពើរបស់បណ្ដាជនខ្មែរកម្ពុជាក្រោមនាសម័យនោះហើយ ដែលកន្លងមក១០ឆ្នាំ(១៩៥៥) ង៉ោ ឌិនឃីម បានចងគំនុំសងសឹកយ៉ាងធំក្នុងពេលគាត់ឡើងកាន់អំណាច ដោយបានចាប់ផ្ដើមព្យាបាទធ្វើទុក្ខបុកម្នេញខ្មែរកម្ពុជាក្រោមគ្រប់បែបយ៉ាងឥតត្រាប្រណី ។

ដូច្នេះកង្វល់ធំៗរបស់រាជរដ្ឋាភិបាលខ្មែរនៅពេលនោះ គឺជួយជប៉ុនក្នុងសង្គ្រាមរបស់គេផង ដោះស្រាយបញ្ហាដ៏សែនពិបាក គឺលក្ខន្តិកៈនៃដែនដីកូសាំងស៊ីនផង ។ នៅចន្លោះពេលនោះសង្គ្រាមនៅមហាសមុទ្រប៉ាស៊ីហ្វិកនៅតែឆេះសន្ធោសន្ធៅនៅឡើយ ។ នៅថ្ងៃទី ០១ មេសា ១៩៤៥ ការប្រយុទ្ធដ៏សាហាវដណ្ដើមយកកោះអូគីណាវ៉ា ប្រទេសជប៉ុន ក៏បានចាប់ផ្ដើមឡើង ។

ថ្ងៃទី ១២ មេសា ១៩៤៥ ប្រធានាធិបតីសហរដ្ឋអាមេរិក ហ្វ្រង់គ្លិន រូស៊ីវែលស៍ (Franklin Roosevelt) បានទទួលមរណភាព ហើយអនុប្រធានាធិបតី ហារី ទ្រូមែន (Harry Truman) ឡើងកាន់តំណែងបន្ត ។

ថ្ងៃទី១៧ កក្កដា ១៩៤៥ ពួកសម្ព័ន្ធមិត្តបានបើកការប្រជុំមួយនៅប៉ុតស្ដាំ ដើម្បីបែងពិភពលោកចែកគ្នា ដែលមាន Truman, Stalin ហើយនឹង Churchill បានចូលរួមក្នុងសន្និសីទនោះ ។ ចំណែកខាងឧត្ដមសេនីយ៍ ដឺហ្គោល គេពុំបានអញ្ជើញឱ្យចូលរួមជាមួយគេទេ ។ អ្នកសង្កេតការណ៍នាសម័យប្រជុំនោះ បានឱ្យយោបល់ និងជំនឿយ៉ាងច្បាស់ថា ប្រសិនបើប្រធានាធិបតីរូស៊ីវែលត៍ មិនទាន់អនិច្ចកម្មទេនោះ បារាំងប្រាកដជាពុំអាចដាក់ជើងលើឥណ្ឌូចិនទៀតបានឡើយ ។ រឿងនេះ មានហេតុការណ៍៣យ៉ាងជាភស្តុតាង គឺ :

១-នៅពេលដែលឧត្ដមនាវី ម៉ោន មន្ទិន ទទួលយកកងឯកភាពមួយចំនួនតូចឱ្យចូលរួមក្នុងប្រតិបត្តិការសឹករបស់ខ្លួននោះ ដឺហ្គោល បានស្នើសុំប្រគល់កងពលបារាំងមួយកងពលធំ ដឹកនាំដោយឧត្ដមសេនីយ៍ ឡឺក្លែរ តែសហរដ្ឋអាមេរិក និងអង់គ្លេសបានបដិសេធ ដោយយកលេសថា ជាឆាកប្រយុទ្ធរបស់ចិន ក្រោមបញ្ជាការរបស់ឧត្ដមសេនីយ៍ ជាង កៃឆិក ជាអ្នកទទួលខុសត្រូវស្រេចហើយ ។

នៅថ្ងៃទី២៣ ឧសភា ១៩៤៥ ដឺហ្គោល បានបញ្ជូនឧត្ដមសេនីយ៍ ក្វាង សាំង អគ្គសេនាធិការកងទ័ពបារាំង ឱ្យទៅស្ទាបស្ទង់មើលអាមេរិកាំង ក្រែងលោមានការឡើងគោកនៅឥណ្ឌូចិន ហើយក៏បានដឹងថា ការវាយសម្រុកលើកក្រោយ នឹងត្រូវធ្វើនៅប្រទេសជប៉ុនតែម្ដង ។ រដ្ឋាភិបាលដឺហ្គោល បានធ្វើសំណើរមួយទៅរដ្ឋាភិបាល ស.រ.អា ដើម្បីប្ដូរគ្នាយកអធិបតេយ្យបារាំងនៅឥណ្ឌូចិន ទល់និងការប្រគល់កងកម្លាំងបារាំងចំនួន២ កងពលធំ ក្រោមបញ្ជាការរបស់ឧត្ដមសេនីយ៍ ឡឺក្លែរ ឱ្យទៅអាមេរិកប្រើប្រាស់ក្នុងការវាយលុកនេះ ។ កងទ័ពនេះឯងហើយ ដែលដឺហ្គោលបានរៀបចំទុកដើម្បីវាយដណ្ដើមយកឥណ្ឌូចិនមកវិញ ។ ប៉ុន្តែបានសហរដ្ឋអាមេរិកទាត់ចោលសេចក្ដីស្នើសុំនេះ ។

៣-សេចក្ដីសម្រេចចិត្តរបស់សន្និសីទនៅប៉ុតស្ដាំបានចែងថា នៅពេលណាដែលជប៉ុនសុំចុះចាញ់ការទម្លាក់អាវុធរបស់ជប៉ុននៅឥណ្ឌូចិនត្រូវបែងចែកជា២មណ្ឌលគឺ នៅប្រទេសលាវ និងវៀតណាមត្រូវធ្វើត្រង់ខ្សែស្រប១៦ ។ ការដកអាវុធ និងការគ្រប់គ្រងបណ្ដោះអាសន្ន និងត្រូវប្រគល់ទៅឱ្យប្រទេសចិន ដែលមានឧត្ដមសេនីយ៍ ជាង កៃធិក ជាអ្នកទទួលខុសត្រូវ ។ ឯនៅប្រទេសខ្មែរ និងប្រទេសយួនត្រង់ខ្សែស្របទី១៦ ភារកិច្ចដូចគ្នានេះ នឹងត្រូវប្រគល់ឱ្យអង់គ្លេស ដែលមានឧត្ដមនាវី ម៉ោន មន្ទិន ជាអ្នកទទួលខុសត្រូវ ។

ថ្ងៃទី ០៦ សីហា ១៩៤៥ សហរដ្ឋអាមេរិកបានសម្រេចចិត្តទម្លាក់គ្រាប់បែកបរមាណូលើណាសាគីនិងហ៊ីរ៉ូស៊ីមា ប្រទេសជប៉ុន ។ ថ្ងៃទី៨ សីហា ១៩៤៥ ជប៉ុនបានផ្ទេរអំណាចត្រួតត្រាកូសាំងស៊ីនទៅឱ្យ ខាំសៃ នៅវៀតណាម ។

នៅប្រទេសកម្ពុជាព្រឹត្តិការណ៍ទាំងនេះជាសញ្ញាឱ្យដឹងថា សង្គ្រាម និងត្រូវបញ្ចប់ក្នុងរយៈពេលខ្លីខាងមុខនេះ ជាហេតុនាំឱ្យក្រុមអ្នកជាតិនិយម ជាពិសេសគឺលោក សឺន ង៉ុកថាន់ មានសេចក្ដីព្រួយបារម្ភជាខ្លាំងបំផុតក្នុងកិច្ចការពារឯករាជ្យជាតិ ព្រោះខ្វះពេលរៀបចំផង ខ្វះកម្លាំងទាំងផ្លូវសម្ភារៈទាំងផ្លូវចិត្ត ហើយថែមទាំងដឹងច្បាស់ថា បារាំងបរោចោលអស់លក្ខណ៍នឹងត្រឡប់មកយកអំណាចនៅឥណ្ឌូចិនវិញ ត្បិតនៅថ្ងៃទី១៧ សីហា ១៩៤៥ បន្ទាប់ពីជប៉ុនបានប្រកាសសុំចុះចាញ់នោះ ដឺហ្គោល បានថ្លែងការណ៍ទៅកាន់សហភាពបារាំងថា សាធារណរដ្ឋបារាំងប្រាថ្នាចង់ដាក់អធិបតេយ្យរបស់ខ្លួននៅឥណ្ឌូចិនវិញ ។ ដើម្បីឱ្យសម្រេចកិច្ចការនេះ ដឺហ្គោល បានតែងតាំងឧត្ដមសេនីយ៍ដែលមានឈ្មោះល្បីក្នុងការធ្វើសង្គ្រាម គឺឧត្ដមសេនីយ៍ ឡឺក្លែរ ឱ្យធ្វើជាមេបញ្ជាការនៃបេសកម្មយោធពលបារាំងនៅចុងបូព៌ាប្រទេស ហើយ និងឧត្ដមនាវីផ្កាយ៥ ដែលជាមេទ័ពសំណប់របស់គាត់ឈ្មោះ ជាសង់ឌិយើរ ឱ្យជាមេកងទ័ពជើងគោល, និងជើងទឹក និងជើងអាកាស ព្រមទាំងជាអគ្គស្នងការនៃសាធារណរដ្ឋបារាំងប្រចាំឥណ្ឌូចិន ដែលមាននាទីដូចជាអគ្គទេសាភិបាលបារាំងកាលពីសម័យមុនដែរ ។

សេចក្ដីព្រួយបារម្ភមួយទៀត គឺរាជសម្បត្តិរបស់ព្រះករុណា សីហនុ ព្រោះក្រុមរាជវាំង និងក្រុមអ្នកជាតិនិយមមានគម្រោងការជាមួយគ្នាពីមុនមក ដើម្បីធ្វើការតស៊ូយកឯករាជ្យពីបារាំងដែលមានការជំពាក់វ៉ាក់វិន និងសេចក្ដីប្រកាសឯករាជ្យជាមួយជប៉ុន ។ ដើម្បីដោះស្រាយសេចក្ដីព្រួយបារម្ភនេះ លោក សឺន ង៉ុកថាន់ និងលោក ប៉ាច ឈឺន បានធ្វើការប្រជុំមួយយ៉ាងសម្ងាត់ជាមួយទ្រង់សុរាម្រិត និងមហាក្សត្រត្រីយានី កុសុមៈ ដែលកាលនោះជារាជានុសិទ្ធិ ។ បន្ទាប់ពីបានលើកបញ្ហាយកមកពិគ្រោះពិភាក្សាគ្នារួចហើយ ក៏បានសម្រេចចិត្តរួមគ្នា ចែកមុខនាទីគ្នាបំពេញរៀងៗខ្លួន ។ ទាំងអស់គ្នាយល់ថា បញ្ហាការពារឯករាជ្យ ត្រូវតែចរចាដោយសន្តិវិធី គឺមិនអាចទប់ដោយកម្លាំងអាវុធទេ ព្រោះការរៀបចំការពារទឹកដីទើបបានត្រូវបំពេញភារកិច្ចនេះ ។ ឯបញ្ហាការពាររាជសម្បត្តិនៃព្រះករុណា សីហនុ ដើម្បីកុំឱ្យពួកសម្ព័ន្ធមិត្ត ជាពិសេសបារាំងយកលេសចោទប្រកាន់ទៅព្រះចៅសីហនុក្នុងរឿងនេះ ក្រុមអ្នកជាតិនិយមត្រូវចាត់វិធានការណ៍យ៉ាងណា ដើម្បីបង្វែរដានការចោទប្រកាន់ ឱ្យធ្លាក់ទៅលើក្រុមអ្នកជាតិនិយមដែលមានលោក សឺន ង៉ុកថាន់ ជាអ្នកទទួលខុសត្រូវ ។ គម្រោងការសម្ងាត់នេះ បានត្រូវហាមយ៉ាងដាច់ខាត សូម្បីស្ដេចសីហនុក៏មិនឱ្យដឹងដែរ ។

ថ្ងៃទី១០ សីហា ១៩៤៥ មានរដ្ឋប្រហារមួយបានកើតឡើង **តទៅលេខក្រោយ**


CAMBODIA
PHONE CARD

City of Lights Parade

# ដង្ហែក្បួន និងពិធីនានាឆ្នាំ២០១៣ នៅឡូវែល ក្រុងដែលពោរពេញដោយពន្លឺ

# 2013 Lowell City of Lights Parade & Holiday Celebration

## Saturday, November 30, 2013 -ថ្ងៃសៅរ៍ ទី៣០ ខែវិច្ឆិកា ឆ្នាំ២០១៣

## 11am to 8pm in downtown Lowell -ពីម៉ោង១១ដល់០៨យប់ នៅដោនថោន

## Visit www.Lowell.org for complete information!

**SCHEDULE OF EVENTS** កាលវិភាគកម្មវិធី

**Holiday Express Village***
10am – 4pm, New England Quilt Museum( សារមន្ទីរភួយ ) , 18 Shattuck Street
*Please note: Standard museum admission applies. ( តម្លៃធម្មតាចូលទស្សនាសារមន្ទីរ )

**Childrens' Shopping Day at the Pollard Memorial Library** -នាំក្មេងទៅស្តុកឹងនៅបណ្ណាល័យផូឡាដ
**Pollard Memorial Library (Ground Floor Meeting Room), 401 Merrimack Street**
**10am – 1pm: Kids ages 4-14 years only**
**1pm – 2pm: Members of the Friends of the Library only**
**2pm – 4pm: General Public welcomed**
Children can shop from hundreds of donated gently-used items ranging from $1 to $5.

**Holiday Shopping Shuttle on the COOL Bus** ជិះឡានយូលប៊ីសទៅស្តុកឹងនៅឡូវែល
**11:30am - 3:30pm, throughout Downtown Lowell**
VisitNINE (9) local art gallery and museum gift shops for one-of-a-kind handcrafted gifts made right here in Lowell!

**Shop Local, Shop Lowell!** -ទិញផលិតផលក្នុងតំបន់ឡូវែល
**Merrimack Valley Small Business Assistance Center**
Check www.Lowell.org for details and locations where you can win a Shop Local Tote!
( សណាងឈ្នះកាបូបស្ពាយចំហៀង )

**Holiday Art Exploratory for Kids** ( នាំក្មេងទៅកំសាន្តសិល្បៈនៃការរុករក )
**12:30pm – 3pm, UnchARTed Gallery, 66 Merrimack Street**
Make spectacular spin art creations and scratch art ornaments for your tree (while supplies last).

**6th Annual Hot Chocolate Competition*** ប្រកួតប្រជែងធ្វើសូកូឡាក្តៅ ឆ្នាំទី៦
**1pm – 3pm, Visit** www.Lowell.org **for full list of locations** មើលគេហទំព័រនេះដើម្បីស្គាល់ទីតាំង
*Please note: Cost is 25 cents per 4oz sample. តម្លៃ1 កែវចំណុះ4oz ថ្លៃ 25សេន

**Photos with Santa*** ថតរូបជាមួយសាន់តា នៅសាលាក្រុង
**1pm – 3pm, Lowell City Hall, 375 Merrimack Street**
*Please note: Cost is $2 per photo. 1រូបថត2ដុល្លារ

**Lucky Bob's Interactive Magic and Juggling Extravaganza!** មើលគេសម្តែងសិល្បៈវេទមន្ត
**1:30pm & 3:15pm, Lowell Five, 34 John Stree**

**Self-Guided Tours of St. Anne's Church** -ចូលទស្សនាវិហារ St.Anne ដោយខ្លួនឯង
**2pm – 6pm, St. Anne's Church, 8 Kirk Street**

**Official City of Lights Nighttime Parade and City Hall Holiday Lighting** -ផ្តើមដង្ហែក្បួនផារ៉េដនៅម៉ោង ៤: ៣០ នាទីរសៀល
**4:30pm - 6:30pm, Parade route starts on Jackson Street** -ផ្តើមនៅផ្លូវចាកសុន បញ្ចប់នៅផ្លូវទៅសាលាក្រុង មានសាន់តាខូស បើកភ្លើងបំភ្លឺក្រុង

**Annual City of Lights Choral Concert at St. Anne's Church** -ទៅច្រៀងចម្រៀងជាពួកនៅវិហារសេនអាន់
**6:30pm, St. Anne's Church, 8 Kirk Street**
Wrap up the festive day and evening with a beautiful two-part choral concert!

**Event Sponsors** **Parade Sponsor** **Band Sponsors** **City of Lights is presented by:**






















